សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា
KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947



វិចារណកថា

# ស្រុកខ្មែរមានខ្យល់ត្រជាក់ធ្លាក់ពីខាងលិច
## Freezing air from West

**ដោយ : ពិន សំខុន**

ស្រុកអាមេរិកសហភាពយូរ៉ុបកំពុងចូលក្នុងរដូវត្រជាក់បំផុតប្រចាំឆ្នាំតែស្រុកខ្មែរកើត


ហ៊ុន សែន


សម រង្ស៊ី ក្នុងដំណើរតាមសម្តេចសីហនុ


បាតុករទាមទារយុត្តិធម៌សេរីភាព

រោគអ្វីដែរ ទើបព្រិលក៏ធ្លាក់យ៉ាងត្រជាក់ស្ទើររឹងធ្លាមនឹងគេដែរ? លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន

**តទៅទំព័រទី ១៨**




The Cambodian-American Biweekly Newspaper
សារព័ត៌មានខ្មែរ-អាមេរិក ចេញពីរសប្តាហ៍ម្តង

a free local newspaper reaching over 20,000 Cambodian readers in the Greater Lowell area every two weeks
ផ្តល់ជូនកាសែតឥតគិតថ្លៃដល់អ្នកអានខ្មែរច្រើនជាង២០០០០នាក់នៅតំបន់ឡូវែលរាល់ពីសប្តាហ៍ម្តង

Soben Pin, Managing Partner អ្នកគ្រប់គ្រង សុបិន្ត ពិន

978.677.7163 (Office) 978. 656.8141 (Mobile)

សូមកក់ពាណិជ្ជកម្មអ្នកជាមួយយើងខ្ញុំ ហើយទទួលបានការបញ្ចុះតម្លៃ២០%

## Reserve Your 2014 Ads with us today and receive up to 20% OFF!

(Please mention this coupon ad: Winter2013)

## Sample of our affordable pricing បញ្ជីតម្លៃពាណិជ្ជកម្មក្នុងតម្លៃសមរម្យ

| ទំហំទំព័រ Page Size | ប្រវែង Length x Width | 1ខែ 1 month | 3 ខែ 3 months 10%OFF | 6 ខែ 6 months 15%OFF | 12 ខែ 12 months 20%OFF |
|---|---|---|---|---|---|
| 1/2 page color | (6.5"x10") | $484 | $440/m | $411/m | $387/m |
| 1/4 page color | (6.5"x5") | $264 | $240/m | $224/m | $211/m |
| 1/4 Classify Ad | (6.5"x5") | $160 | | | |
| 1/8 Classify ad | (3.25"x5") | $100 | | | |
| Business Card | | $50 | | | |

## Our 2014 Publishing Dates កាលវិភាគបោះពុម្ព

| | |
|---|---|
| January 10th & 24th | July 11th & 25th |
| February 7th & 21st | Augus 8th & 22nd |
| March 7th & 21st | September 5th & 19th |
| April 4th & 25th | October 10th & 24th |
| May 9th & 23rd | November 7th & 21st |
| June 6th & 20th | December 5th & 19th |

*all ad materials are due one week prior to publishing date.
រាល់គំរូពាណិជ្ជកម្មត្រូវបញ្ជូន1សប្តាហ៍មុនចូលរោងពុម្ព




## Call or Visit our Sales Office

45 Merrimack Street. Suite 218A. Lowell, MA 01852
Tel: 978.677.7163. Cell: 978. 656.8141 Fax: 978.677.7092
Email: sobenpin@khmerpost.us or KhmerPostUSA@gmail.com
www.khmerpost.us | www.facebook.com/KhmerPostUSA



# ដំណើរតាមជើងសមុទ្រ "អាត់ឡង់ទីក" ភាគ៣







**តពីលេខមុន**

ដោយ : ពិនសំខុន

ថ្វីត្បិតតែគ្មានរលកធំៗ ដូចការព្រួយបារម្ភរបស់អ្នកដំណើរថានឹងអាចកើតជាយថាហេតុក៏ដោយមហានាវា "ន័រវេសាន" នៅតែបន្តដំណើរអស់២ថ្ងៃ៣យប់យ៉ាងហ្នឹងថ្កល់សំដៅទៅ "ថមប៉ា" នៃរដ្ឋហ្វ្លរីដា គ្មានសញ្ញាណាមួយបង្ហាញពីភាពភិតភ័យអ្វីពីមហាសាគរបន្តិចឡើយ ។ នាថ្ងៃទី៣នេះធាតុអាកាសបានកើនខ្ពស់ច្រើនជាង៥០អង្សារ F ហើយនៅជាន់ទី១៥-១៦-១៧ ជាជាន់ចំហរនឹងពន្លឺថ្ងៃ ក្មេងចាស់ស្រីប្រុសនាំគ្នាចុះក្នុងអាងហែលទឹក សម្រាប់មនុស្សធំ សម្រាប់កុមារឬចុះអាងពពុះ ឬក៏អាំងសំដីលខ្លួន ខ្លះទៀតរត់ឬហាត់ប្រាណ យ៉ាងកុះករ ហាក់ដូចជាពួកគេបានមកដល់ឆ្នេរសមុទ្រកោះក្តៅណាមួយអ៊ីចឹង ។

មិនយូរប៉ុន្មានយើងក៏មកដល់"ថមប៉ា"ជាចំណតដែលទេសចរអាចចុះកំសាន្តបាន៨ម៉ោង ។ នៅជ្រោយចុងបង្អស់នៃសហរដ្ឋអាមេរិកនេះ ថមប៉ា ជាតំបន់ទេសចរដ៏ល្បីល្បាញបំផុតដោយសារតែធាតុអាកាស "ត្រូពីកាល"នៃតំបន់នឹងដោយសារឆ្នេរខ្សាច់ដ៏ធំវែងល្វឹងល្វើយហ៊ុំព័ទ្ធដោយកន្លែងកំសាន្តប្រណិតនឹងធំៗ មានទាំងស្ទូឌីយោហូលីវូដ នឹងឌិទ្សាន ឌីស្នេឡិន ទៀតផងគឺជាទីសំចតនៃនាវាទេសចរសមុទ្រគ្រាក់ៗជញ្ជូនភ្ញៀវពីកៀនកោះពីភពលោកមកទម្លាក់-ទស្សនារាប់ម៉ឺន-សែននាក់ក្នុង១ថ្ងៃៗ ។ នៅក្នុងទិសដៅទេសចរជាង២០កន្លែងនៅហ្វ្លរីដា ដែលក្រុមនាវិកបានចង្អុលបង្ហាញ និងត្រៀមជូនដំណើរទៅមកយើងបានជ្រើសយក "យូនីវើសលអ័រឡានដូស្ទូឌីយោ" ដែលជាក្រុមហ៊ុនថតកុនដ៏ធំជាងគេបង្អស់នៅសហរដ្ឋអាមេរិកនេះ ហើយសេចក្តីសម្រេចចិត្តនេះ គឺចង់បំពេញចិត្តកុមារាប៉ុណ្ណារ៉ូជាងគេ តែក៏មានការបំពេញចិត្តឪពុកម្តាយខ្លះដែរ ។ យើងបានចាកចេញពីនាវាសំដៅទៅ "យូនិវើសលស្ទូឌីយោ"នៅម៉ោង១១ព្រឹកធ្វើដំណើរតាមរថយន្តបើស ប្រមាណជាង១ម៉ោងទើបដល់ ដោយសង្ឃឹមថា នឹងត្រឡប់មកដល់នាវាវិញ ឱ្យបានមុនម៉ោង៧យប់ ។ ទៅដល់ទីនោះយើងចូលទៅក្នុងពិភពនៃក្តីស្រម័យដ៏ជាក់ស្តែងមួយ នៅក្នុងបរិវេណដ៏ធំសម្បើមមួយ ភូមិដ្ឋានទាំងមូល ដូចជាផ្នែកមួយនៃទីក្រុងញូយ៉កបានត្រូវគេសង់ឡើងវិញ ដូចគ្នាបេះបិទសម្រាប់ថតកុន តួកុនល្បីខ្លះចេញមកសម្តែងតាមផ្លូវមានការដង្ហែរក្បួនដ៏វែង ហើយ

តទៅទំព័រទី ១១

# វាចារ លោក វាស្នា នួន នាឪកាសដាច់ឆ្នាំ២០១៣ (តចប់)

## Interview with Vesna Nuon

**ខ្មែរផុស:** ឥឡូវខ្ញុំចង់ងាកមកសួរអំពីបញ្ហាសេដ្ឋកិច្ចនៅឡូវែលវិញម្តង តើបើតាមយោបល់លោកនៅទីនេះ មានអ្វីគ្រប់គ្រាន់សំរាប់អភិវឌ្ឍន៍ក្នុងសហគមន៍ហើយឬនៅ? ឬក៏នៅខ្វះអ្វីទៀត?

**វាស្នា នួន:** បើទោះជាយើងមានប៉ុណ្ណាក្តី ខ្វះខាតចេះតែខ្វះខាតហើយ! សេដ្ឋកិច្ចក្នុងសហគមន៍ គឺដូចជាទូកអីចឹង តែទូកធំ ក្តោងក៏ធំដែរ ។ បងប្អូនក្នុងរបររកស៊ីហ្នឹង គឺបើកត១គ្នា... មិនសូវឃើញមានរលំទេតែពួកគាត់ ក៏មិនសូវមានទៅសុំឱ្យជួយពីក្រុងអ្វីដែរ... នៅកណ្តាលក្រុង ឬនៅភូមិខ្មែរចេះតែមានបើកថ្មី១ ដូចជា "ខេ ផាម៉ាស៊ី" នឹងសម្ពោធថ្ងៃ២៨នេះហើយ... នៅជិតហាងហុងកុង ក៏មានហាងអាស៊ីថ្មី មានកន្លែងធ្វើសក់... ដូច្នេះនៅឡូវែលនេះក៏ជាកន្លែងពាណិជ្ជកម្មមួយសំខាន់ដែរ ។

**ខ្មែរផុស :** តំបន់ក្រុងខ្មែរឡូវែលនេះមានមណ្ឌលរកស៊ីធំ១នោះចំនួនបីតែមិនសូវមានសម្ផស្សស្រស់ស្អាតទេ ហេតុអ្វីក៏មិនយកពន្ធដារដែលគេបានបង់នោះទៅជួយកែរលំអក្រុងខ្មែរនោះវិញផង?

**វាស្នា នួន :** បងចង់និយាយពីអ្នករកស៊ី ឬអ្នកគ្រប់គ្រង?

**ខ្មែរផុស:** បាទ អ្នកគ្រប់គ្រង

**វាស្នា នួន:** ខ្ញុំនិយាយឱ្យចំទៅចុះ! អ្នកដឹកនាំក្រុងពីដើមមក ហើយទៅថ្ងៃមុខក៏អីចឹងដែរ មិនសូវចាប់អារម្មណ៍រឿងនេះទេ ហេតុអ្វី? អ្នករកស៊ីអាស៊ីយើងនៅតំបន់"ហាយឡិន"នៅ "អេកូ"នៅ "សៅឡូ"បង់តាក់ដូចគេដែរ ហេតុអីក៏ផ្លូវក្រហេងក្រហូងមិនស្អាតដូចផ្លូវនៅឡូវែលដូចគ្នានាតំបន់ខាង "បែលវ៉ាឌៀ" ខាង "បដឹកវីល"? និយាយពីសន្តិសុខវិញក៏អីចឹងដែរ ស្មានថា តំបន់អាស៊ីហ្នឹងមិនត្រូវការប៉ូលិសការពារតំបន់ខ្លួន មិនឱ្យមានបាញ់គ្នា មិនឱ្យមានផ្លូវស្អាតទេឬ? មិនត្រូវការរស់នៅមានសន្តិសុខគ្រប់គ្រាន់ឬ? ស្មានថា អ្នកទាំងនោះបង់តាក់ច្រើនជាងអ្នកតំបន់អាស៊ីឬ? អត់ទេ! នេះពីព្រោះគេយល់ថា យើងជាតំបន់ទេសចររបស់គេ គេជួយតំបន់គេ៨ ទៅជួយតំបន់ជាយ១ ក្រុងហ្នឹងតែ២អីទេ! តែបើសិនណាជាយើងមានតំណាងតាមជាយហ្នឹងច្រើន អង្គុយនៅទីប្រឹក្សាក្រុងហ្នឹង អ្វី១នឹងកែរ ហោចណាស់ក៏ចំណាយឡើងបាន៤អីចឹងដែរ នៅឯនេះបាន៦ទៅចុះ...។

**ខ្មែរផុស:** យើងបែរមកនិយាយពីផ្នែកអប់រំនឹងសិក្សាធិការវិញម្តង តើកូនខ្មែរមានអ្វី១គ្រប់គ្រាន់សំរាប់ការសិក្សាបានវែងឆ្ងាយរបស់ខ្លួនហើយឬនៅ ?

**វាស្នា នួន :** សាលារៀនបានផ្តល់មធ្យោបាយសិក្សាដល់សិស្សដូច១គ្នាទាំងអស់ តែសម្រាប់ឪពុកម្តាយខ្មែរមិនសូវមានទាក់ទងទៅសាលាទេ ហេតុអ្វី? កូនសិស្សខ្មែរឬអាស៊ីមានច្រើន ក៏ត្រូវការជំនួយពីឪពុកម្តាយដែរ...តែឪពុកម្តាយមិនសូវទៅ ក៏មានបុព្វហេតុខ្លះដែរ សួថា តើមានគ្រូខ្មែរប៉ុន្មាននាក់? មានអ្នកជំនួយការគ្រប់គ្រងប៉ុន្មាននាក់? មានតិចណាស់! អ្នកទាក់ទងទៅគ្រួសារខ្មែរមានតែ១ទេ តាំងពីយូរមកហើយ នៅសាលាសាធារណ គឺលោក ប៉េង អាន សួរថាតើលោក ប៉េង អាន អាចទាក់ទងទៅគ្រប់គ្រួសារខ្មែរបានឬក៏អត់? គាត់ខំ! តែទោះជាខំប៉ុណ្ណាក៏ដោយក៏ទាក់ទងមិនបានគ្រប់គ្នាដែរ សួរទៀតថា តើគ្មាននិស្សិតអាស៊ីនៅមហាវិទ្យាល័យទេឬ? មាន!



ដូច្នេះត្រូវទៅស្វែងរកជ្រើសរើសនៅទីនោះ! ខ្ញុំដឹងថា មានខ្មែរអ្នករៀនចប់ខាងគ្រូបង្រៀន តែដាក់ពាក្យសុំធ្វើការមិនបាន...ក្រុងនេះ ការជ្រើសរើសបុគ្គលិកសំអាងទៅលើបក្សពួកដែរណា! មើលសាលាហ្នឹងឱ្យមែនទែន តើគេជ្រើសរើសបុគ្គលិកជាលក្ខណបងប្អូននោះយ៉ាងម៉េច? គេជួយ!

**ខ្មែរផុស :** តើគេអាចទប់ស្កាត់ជម្ងឺសង្គមនេះបានយ៉ាងដូចម្តេច?

**វាស្នា នួន:** ទប់ស្កាត់គឺជាភារកិច្ចរបស់ខ្មែរគ្រប់គ្នា បើខ្មែរម្នាក់១យល់ថា "ខ្ញុំមកនេះគ្រាន់តែជ្រកកោនតែប៉ុណ្ណោះ"ទេនោះ គឺបើកឱ្យគេធ្វើអ្វីបានស្រេចនឹងចិត្តហើយ ខ្ញុំដឹងថា បងប្អូននិយាយពាក្យនេះមានច្រើន ហើយមកនៅស្រុកនេះកំសុយណាស់ ក៏១៥ឆ្នាំម្នាក់១ដែរ... ដូច្នេះខ្ញុំសូមកុំឱ្យនិយាយពាក្យនេះតទៅទៀត សូមទិញយកទៅកប់ចោល សុំឱ្យនិយាយថា"កន្លែងនេះជាផ្ទះរបស់ខ្ញុំ ខ្ញុំមានសិទ្ធដូចអ្នកទាំងអស់គ្នា បានបង់ពន្ធដារដូចគ្នា" ឱ្យអ្នកជិតខាងគេមកធ្វើការឱ្យយើងគេមិនធ្វើទេ! ។ តួនាទីរបស់យើង គឺចេញទៅបោះឆ្នោតឱ្យបានគ្រប់១គ្នាបោះ ឱ្យមានដំណាងរបស់យើងដាក់ក្នុងក្រុមប្រឹក្សាក្រុងហ្នឹង ដើម្បីជួយរត់កិច្ចការរបស់យើង មានអី អាស៊ី៧-៨ពាន់នាក់ បើចេញទៅបោះឆ្នោត តែ៤ពាន់នាក់ គឺបានហើយ ហើយជាមួយ៤ពាន់នាក់នោះ យើងក៏អាចរកមនុស្សតំណាងយើង១នាក់ទៀត ដែលមិនចាំបាច់តែខ្មែរទេមើលអ្នកណាដែលចេះបំរើផលប្រយោជន៍យើងផង ហើយ "ធ្វើ" មិនមែនត្រឹមតែ "ថា" នោះទេ។

**ខ្មែរផុស:** នៅមានតួរនាទីផ្សេង១ទៀតដែរ ដែលអាចមកជាជំនួយជាប្រយោជន៍ដល់ជនជាតិភាគតិច ដូចជា "ដំណាងរដ្ឋ" មានខ្មែរយើងបំរុងឈរឈ្មោះដែរឬទេ ?

**វាស្នា នួន :** យើងត្រូវត្រៀមខ្លួនសម្រាប់តួនាទីទាំងអស់នោះមិនថាឡើយក្រុមប្រឹក្សាក្រុង ឬក្រុមប្រឹក្សាក្រសួងអប់រំនោះទេ នៅមានតំណាងរាស្ត្ររដ្ឋ ព្រឹទ្ធសភារដ្ឋ ទៀត ទន្ទឹមហ្នឹងក៏យើងត្រូវត្រៀមខ្លួនប្រជាពលរដ្ឋយើងដែរ ឱ្យយល់នូវតម្លៃនៃសន្លឹកឆ្នោតនឹងតួរនាទីរបស់ខ្លួនថែម

ទៀត...ឥឡូវតំណាងរាស្ត្រខាង "ហាយ




មណ្ឌលពាណិជ្ជកម្មក្រុងខ្មែរនៅឡូវែល

ឡិន" ហ្នឹងចេញមកខ្លះហើយ បែបភ័យខ្លួនតែនៅតំបន់ "អេកឹ" ឬតំបន់ "បែលវឺឌៀ"យើងពិបាកយកឈ្នះហើយ ព្រោះពលរដ្ឋអាស៊ីតិចណាស់ តែនៅ "ហាយឡិន"មិនមែនថាធ្វើមិនកើតទេ...

**ខ្មែរផុស:** ខ្មែរផុសបានផ្សព្វផ្សាយច្រើន បង្ហាញពីព្រឹត្តិការសង្គមនឹងកិច្ចការដែលពលរដ្ឋគួរដឹងត្រូវយល់ ដើម្បីប្តូរសហគមន៍ពីជនភៀសខ្លួនឱ្យទៅជាពលរដ្ឋខ្មែរ-អាមេរិកាំង តើនៅមានការខ្វះខាតអ្វីទៀតទេ ដែលត្រូវធ្វើបន្ថែម?

**វាស្នា នួន:** ខ្មែរផុសខ្ញុំមើលម្តង១ដែរ ទាក់ទងអត្ថបទ ឱក ហាវ ស្តីពីរឿងបោះឆ្នោត កន្លែងខ្លះគេឥតបាននិយាយទេ ពីព្រោះវាប៉ះពាល់ដល់ថ្នាក់ដឹកនាំសង្គមគេតែចំពោះខ្ញុំវាប៉ះចំរៀងលុយ "ហ្វាន់រ៉េសិញ"ដែលខ្ញុំឥតបានប៉ះពាល់អីបន្តិចទេ តែអ្នកកាន់លុយទេ **តទៅទំព័រទី ២៣**




# សេចក្តីអញ្ជើញចូលរួម“ប្រេសក្លឹប”នៅឡូវែល លោកស្រី លោក ប្រិយមិត្តអ្នកសហគមន៍ខ្មែរ

January 17th, 2014

Dear Community leaders and members:

You are invited to attend the KhmerPost USA Press Club luncheon on Friday January 31st from 11:30AM - 2:30PM at Tepthida Khmer Restaurant, 115 Chelmsford St, Lowell, MA 01851. Projected attendance will be 40-50 people. The cost for this event is $20 for lunch and refreshments. We would be delighted with your present.

KhmerPost USA is a biweekly, bilingual newspaper serving the Cambodian-American community in Lowell, Massachusetts and beyond. We reach a regular circulation of 10,000 residents in the Lowell area per edition, covering local, national, and international stories.

The Press Club is an event that fosters discussion amongst community members and leaders about the issues of the day. The topic of this event will be local government and the new city council that was sworn in earlier this month. You will have the opportunity to talk with city leaders about the pressing issues in the Cambodian community of Lowell.

Thank you for your time and consideration. Due to the space being limited; please make advance reservations by Monday January 27th by email sobenpin@khmerpost.us or calling Soben Pin at 978-656-8141.

Sincerely,

Roger Samkhon Pin
*Publisher & Editor-in-Chief*

Soben Pin
*Managing Partner*

KhmerPostUSA | 45 Merrimack St, Suite 218A | Lowell, MA 01852 | Tel: 978.677.7163| Fax: 978-677-7092
www.khmerpostusa.com| info@khmerpost.us

សូមអញ្ជើញលោកស្រីលោកមកចូលរួមកម្មវិធី"ប្រេសក្លឹប"ទី១នៃឆ្នាំ២០១៤ ដែលនឹងប្រព្រឹត្តទៅថ្ងៃទី៣១ ខែមករា ឆ្នាំ២០១៤ នៅភោជនីយដ្ឋាន"ទេព្យធីដា"១១៥ ផ្លូវឆែម ហ្វ៊ត ឡូវែល.០១៨៥១ វេលាម៉ោង១១:៣០ ដល់ម៉ោង២:០០ រសៀល ។ វត្តមានលោកស្រីលោក គឺជាការផ្តល់កិត្តិយសដល់វេទិកាសេរី "ប្រេសក្លឹបសារព័ត៌មានខ្មែរ"ដែលគម្រោងចូលរួមដោយវាគ្មិន៥០នាក់ ។

កាសែតខ្មែរផុសស.រ.អា.ជាកាសែត២ភាសាបំរើសហគមន៍ខ្មែរនឹងសហគមន៍ឯទៀត នៅរដ្ឋ "ម៉ាសាឈូសែត" នឹងរដ្ឋផ្សេងទៀតនៃឆ្នេរខាងកើតស.រ.អា.ផ្សព្វផ្សាយពីព័ត៌មានក្នុងតំបន់ពីកម្ពុជាពីពិភពលោកដល់ប្រមាណ១ម៉ឺនគេហដ្ឋាននៅឡូវែលរៀងរាល់២អាទិត្យម្តង។

"ប្រេសក្លឹប" ខ្មែរផុសស.រ.អានេះជា កម្មវិធីជូនវេទិកាសាធារណដល់សមាជិកសហគមន៍ដែលប្រាថ្នា បញ្ចេញយោបល់ចែកចាយដល់សហគមន៍ខ្លួនស្តីពីបញ្ហាប្រចាំថ្ងៃក្នុងសង្គម។ ប្រធានបទលើកនេះទាក់ទងជាពិសេសទៅនឹងនយោបាយរបស់រដ្ឋាភិបាលក្រុងថ្មីដែល ទើបនឹងធ្វើសច្ចាប្រណិធានកាលពីដើមខែមករានេះ ដោយមានការអញ្ជើញអភិបាលនឹងគណក្រុមប្រឹក្សាក្រុងចូលរួមផង។ លោកអ្នកនឹងមានឱកាសធ្វើការចាប់អារម្មណ៍ជូនរដ្ឋបាលសាលាក្រុងថ្មីនឹងបានស្តាប់ការវិវត្តន៍ថ្មីៗក្នុងសហគមន៍ខ្មែរនៅឡូវែលផង ។

**កម្មវិធី:** ម៉ោង ១១:៣០ - ១២:៣០ បដិសណ្ឋារកិច្ចនឹងបង្ហាញពីសហគមន៍សេដ្ឋកិច្ចខ្មែរនៅឡូវែល
ម៉ោង ១២:០០ - ១:០០ ទស្សនៈរដ្ឋបាលសាលាក្រុងថ្មីនឹងពលរដ្ឋឡូវែល
ម៉ោង ១:០០ - ២:០០ ទស្សនៈលើព្រឹត្តការណ៍ផ្សេងខ្លះទៀតនៅឡូវែលនឹងចប់

ក្នុងឱកាស"ប្រេសក្លឹប"នោះ លោកស្រីលោកនឹងបានភ្លក់ស្នាដៃទទួលម្ហូបចំណីខ្មែរសំរាំងដោយម្ចាស់ភោជនីយដ្ឋាន"ទេព្យធីដា" ទទួលបដិសណ្ឋារកិច្ចដោយក្រុមនិពន្ធខ្មែរផុស -ក្រុមបច្ចេកទេសនឹងយករូបភាពនឹងគំនិតលោកអ្នកទៅបញ្ចូលផ្សាយក្នុងទំព័រខ្មែរផុសលេខ១៤៧ បន្ទាប់ផង ។ តម្លៃចូលរួមចំណាយ $២០។

សូមថ្លែងអំណរគុណចំពោះពេលវេលាលោកស្រី លោកដែលនឹងឆ្លើយតបចំពោះសេចក្តីអញ្ជើញនេះឱ្យបានឆាប់រឹតតែប្រសើរ។

ទំនាក់ទំនងជាមួយ សុបិន ពិន អ៊ីមែល sobenpin@khmerpost.us ទូរស័ព្ទ (978)656 8141

**សុបិន ពិន និង សំខុន ពិន**

## តមកពីទំព័រទី ៣ ដំណើរតាមជើងសមុទ្រ"អាត់ឡង់ទិក"...

ច្រើនដងក្នុង១ថ្ងៃ បង្ហាញអំពីតួនឹងបរិក្ខាប្រើសម្រាប់សម្តែងដែលល្បីល្បាញក្នុងខ្សែភាពយន្តសម្រាប់កុមារ ធ្វើឱ្យប៉ុណ្ណារ៉ូ រីករាយឥតឧបមា ។ សម្លៀកបំពាក់នឹងបរិក្ខាប្រើក្នុងភាពយន្តទាំងនោះ សុទ្ធតែមានដាក់លក់សម្រាប់ឱ្យភ្ញៀវទិញទុកជាអនុស្សាវរីយ៍បានទៀតផង ។ យើងបានបន្តដំណើរទស្សនានៅរោង"ឆ្អិនអារម្មណ៍"(Simulator)2-៣កន្លែងដែរ គឺការបញ្ចូលភ្ញៀវអ្នកមកលេងទៅក្នុងការសម្តែងយ៉ាងសកម្មតែម្តង ។ រោងសម្តែងដែលកំដរអារម្មណ៍ប៉ុណ្ណារ៉ូបានប្រសើរជាង





គេនោះ គឺនៅកន្លែងភាពយន្តល្បីល្បាញក្នុងពិភពកុមារ គឺរឿង (Transformer) ដែលកំពុងពេញនិយម ។ ប៉ុណ្ណារ៉ូ ដែលទើបមានកំពស់ត្រឹមទាបបំផុតអនុញ្ញាតឱ្យចូលរួមបាននោះ យើងក៏នាំចូលទៅអង្គុយនៅកៅអីវែងជួរមុខមួយ ជាមួយមនុស្សប្រមាន១៥នាក់ទៀត នៃទីបញ្ជាការ "បបូប៊ី" ជាតួ (transformer) ចិត្តល្អមួយ ។ ស្ថិតនៅជាភ្នែក "បបូប៊ី" ដែលជួនកាលប្តូររាងកាយជាយន្តហោះប្រដេញសម្រាប់ហោះហើរ ជួនកាលប្តូជារថយន្តប្រណាំងសម្រាប់គេចចេញឆ្ងាយ ជួនកាលក្លាយជាមនុស្សដែកដ៏ធំមួយចេញកំចាត់អំពើអយុត្តិធម៌ធ្វើឱ្យអ្នកមើលពីទីបញ្ជាការភ្នែកភ័យញាប់ញ័រដោយសារ (Simulator) ឆ្អិនអារម្មណ៍ឱ្យការចូលរួមប្រយុទ្ធក្លាយជាពិតសម្រាប់យើង ។ សុបិនមិនបានយល់ច្បាស់ពីសង្គ្រាមរបស់ "បបូប៊ី"

ទេ ទាល់តែប៉ុណ្ណារ៉ូនិយាយពីតួប្តូររូបនីមួយៗ ទើបភ្ញាក់ហួសចិត្តថា "កូនក្មេងតូចនេះ ហេតុអ្វីក៏ដឹងច្រើនម្លេះ?" ចប់ហើយចេញមកក្រៅវិញ ហាងលក់វត្ថុ"សង្គ្រាមមនុស្សយន្ត" ដាក់លក់ជាវត្ថុអនុស្សាវរីយ៍ធ្វើឱ្យប៉ុណ្ណារ៉ូទារទិញឱ្យគេមិនឈប់ ។ ថែមពីនោះ នៅក្រៅបរិវេណកុនមានយុទ្ធជនគ្រឿងយន្តពាសដែក(Transformer) ទាំងចិត្តល្អទាំងចិត្តអាក្រក់៣គ្រឿង កំពស់៥ម៉ែត្រ ចេះដើរចេះនិយាយឆ្លើយឆ្លងនៅចាំភ្ញៀវថតរូបជាមួយធ្វើឱ្យរឿងឆ្អិនភ្នែកក្លាយជារឿងរឹតតែពិតថែមទៀត ។ ដោយខ្លាចមនុស្សយន្តធំសម្បើមពេក សុបិនជម្រុញឱ្យប៉ុណ្ណារ៉ូថតរូបជាមួយ (Transformer) ដំបូងខ្លាចមនុស្សយន្តចិត្តអាក្រក់មែន តែក្រោយមកនិយាយថា "គេចូលចិត្តទាំងអស់" ។ ទីបញ្ចប់

យើងចេញមកវិញ ដៃកាន់របស់របរយើងរយោងជាច្រើន ដូចមនុស្សជាភ្ញៀវឯទៀតៗ ដោយចំណង់ទិញទុកជាអនុស្សាវរីយ៍ ឬផ្ញើរកូនក្មួយនៅពេលត្រឡប់មកផ្ទះវិញ ។

នៅ"ថមប៉ា"យើងបានឃើញគេចាយលុយច្រើនឥតគណនា ដើម្បីគុណភាពខ្ពស់នៃសិល្បៈបំរើអារម្មណ៍ ដើម្បីការទាក់ចិត្តទេសចរឱ្យមកចាយលុយដោយស្ម័គ្រចិត្ត ។ មែន!ទេសចររាប់ម៉ឺននាក់បានឆ្លងកាត់កន្លែងបំរើអារម្មណ៍ហួសហេតុឆ្លាក់ទស្សនៈថ្មីៗ បំពាក់អារម្មណ៍ល្អៗ បំពេញដោយបរិយាកាសប្រណិតយ៉ាងពិសេស ធ្វើឱ្យម្នាក់ៗយ៉ាងហោចណាស់ក៏អាចរស់ជាមនុស្សសំខាន់បំផុតមួយរយៈដែរ ។

នាវា"ណ័រវេស៊ាន"បានចេញដំណើរពី"ថមប៉ា"នៅម៉ោង៨យប់នាំអ្នកដំណើរទាំង៤-៥ពាន់នាក់ សំដៅទៅគោលដៅចុងក្រោយ គឺ"បាហាម៉ា" ដែលយើងនឹងទៅដល់នៅថ្ងៃស្អែក គឺជារដ្ឋឯករាជ្យមួយជាកោះស្ថិតនៅក្នុងសមុទ្រ "អាតឡង់ទិក" ។ យប់នោះនៅលើនាវា ប៉ុណ្ណារ៉ូ ទៅលេងនៅកន្លែងផ្ញើរក្មេងយើងឆ្លៀតឱកាសទៅមើលការតាំងលក់ចុះថ្លៃគ្រឿងអលង្ការគ្រឿងក្រអូបទឹកអប់ នឹងផ្ទាំងគំនូររបស់សិល្បករថ្មីៗដែលផ្តើមល្បីឈ្មោះ ។ បន្ទាប់មកខ្ញុំនឹងសុបិនទៅស្តាប់ក្រុមអ្នកចម្រៀងសម័យលើកគោះកែវស្រា "ស្អមផែន" ជូនពរគ្នាទៅវិញ ទៅមករហូតដល់ម៉ោង ១០ ទើបទៅយកកូនទៅសម្រាកយ៉ាងស្កប់ស្កល់ពេញមួយរាត្រី ៕ **នៅមានតទៅលេខក្រោយ**





**KhmerPost USA, LLC**

សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852

លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092

អ៊ីម៉ែល info@khmerpost.us

អានកាសែតនៅគេហទំព័រ www.khmerpost.us

តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម **Advertising**

អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*

លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |

អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ **Editorials**

និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*

(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**

Kim Phien, Kim Sos, Mao Chan Somnom, Mam Yin, Richard Howe Esq. Sengly Kong, Ph.D. James Ostis

ច្នៃសោភ័ណភាពកាសែត **Design Artist**

Heng Chhunleng

ជំនួយការរដ្ឋបាល **Administrative Assistant**

Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# នាឡិកាផេជអាយុ១០០ឆ្នាំហើយ


Richard Howe Jr.

អត្ថបទដោយៈ
រីឆាដ ហូវ ជូញៀរ
ប្រែសម្រួលសង្ខេប
ជាខេមរភាសាដោយ
សុខា

១០០ឆ្នាំមុនខែនេះ (ខែមករា) លោក ដឹដលី ផេជ បើកហាងលក់ស្ករគ្រាប់មួយនៅផ្លូវ១៦ Merrimack ក្នុងក្រុងឡូវែល។ លោក ដឹដលី ផេជ មានក្រុមហ៊ុនផ្ទាល់ខ្លួនមួយឈ្មោះថា ឌី អិល ខមផេនី ហើយគ្រប់គ្រងក្រមុហ៊ុននេះតាំងពីឆ្នាំ១៨៦៦ ហើយក្រុមហ៊ុនរបស់លោកមានទីតាំងប្រមាណជាបួនឬប្រាំក្នុងទីប្រជុំជនឡូវែលអស់ជាច្រើនឆ្នាំ។ ហាងស្ករគ្រាប់ខាងលើជាហាងធំបំផុតរបស់លោកក្នុងចំណោមហាងទាំងអស់របស់លោក។ លោកដឹដលី ជាប់ចិត្តប្រកបជំនួញនៅទីតាំង១៦ Merrimack នោះ ហើយលោកបានបើកសម្ពោធហាងរបស់លោកព្រមនឹងការកសាងនាឡិកាបញ្ឈរដ៏ធំ និងប្រកបដោយក្បាច់រចនាដ៏ល្អវិចិត្រមួយនៅលើផ្លូវ១៦ Merrimack នោះ ប្របនឹងហាងរបស់លោក។ តំណក្រោយៗមកនាឡិកានោះក៏ត្រូវបានគេប្រសិទ្ធនាមថា ផេជខ្លក ។ នាឡិការនោះនៅឈររឹងមាំដល់សព្វថ្ងៃ។


The Page's Clock locates on 16 Merrimack Street in front of Etsogo Restaurant

លោក ដឹដលីផេជ កើតនៅញូឡុនដុន រដ្ឋញូហាមស្ប៊ី នាថ្ងៃទី២០តុលាឆ្នាំ១៨៤៥។ ពេលលោកអាយុបាន៦ឆ្នាំ ក្រុមគ្រួសាររបស់លោកបានផ្លាស់

**តទៅទំព័រទី ២១**

# Page's Clock

*By Richard P. Howe Jr.*

One hundred years ago this month, Dudley Page opened his candy store at 16 Merrimack Street in Lowell. Dudley had been operating the D. L. Page Company since 1866 which had several different locations in downtown Lowell through the years. This new store was his biggest yet and, at 68 years of age, he did not plan to move again.

He celebrated his new location by installing a large, fancy clock on the sidewalk outside his store. Forever after, the clock was known as Page's Clock. It still stands today.

Dudley Page was born in New London, New Hampshire on October 20, 1845. When he was six years old, his family moved to Billerica, Massachusetts. Shortly after the outbreak of the American Civil War, Dudley enlisted in the Union Army at age 17. He served in the 33rd Massachusetts Volunteer Infantry **Continued to page 21**







# ការចុះស្ទង់មតិ និងផ្សព្វផ្សាយព័ត៌មាន : ការព្យុះពារចុងក្រោយដើម្បីធ្វើឱ្យប្រជាជនទីក្រុងឡូវែលទាំងអស់ទទួលបានការធានារ៉ាប់រងសុខភាព

## កំណែទម្រង់ច្បាប់ស្តីអំពីការទទួលបានសេវាថែទាំសុខភាពក្នុងតម្លៃសមរម្យ ផ្តល់ផលប្រយោជន៍ច្រើនដល់ប្រជាជននៃរដ្ឋម៉ាស្សាឈូសិត

រៀបរៀងដោយលោកជិនវិសាលអនុបណ្ឌិតសុខភាពសាធារណៈ



Visal Chin

មិនដល់១០០ថ្ងៃទៀតទេ នឹងអស់ពេលវេលាសម្រាប់ការចុះឈ្មោះដើម្បីទទួលបានសេវាធានារ៉ាប់រងសុខភាពស្របតាមកំណែប្រែច្បាប់ស្តីអំពីការទទួលបានសេវាធានារ៉ាប់រងសុខភាពក្នុងតម្លៃសមរម្យ (the Affordable Care Act) សម្រាប់ប្រជាជនទូទាំងសហរដ្ឋអាមេរិក ។ ទោះបីប្រជាជននៃរដ្ឋម៉ាស្សាឈូសិតក្នុងចំនួនលើសពី៩៨ភាគរយមានការធានារ៉ាប់រងសុខភាពក្នុងទម្រង់ណាមួយក៏ដោយក៏មកដល់ពេលនេះនៅមានប្រជាជននៃរដ្ឋម៉ាស្សាឈូសិតច្រើនរយពាន់នាក់នៅតែមិនទាន់មានការធានារ៉ាប់រងសុខភាព (យោងតាមរបាយការណ៍ឆ្នាំ២០១០ របស់ Massachusetts Health Insurance Survey) ។ ជាពិសេសប្រជាជនទីក្រុងឡូវែលពុំទាន់បានចុះឈ្មោះ ឬពុំទាន់បានដឹងអំពីផលប្រយោជន៍ជាច្រើនដែលច្បាប់កំណែប្រែប្រព័ន្ធសុខាភិបាលជាតិនោះនឹងផ្តល់ជូនពួកគាត់យ៉ាងណាឡើយ ។ ដោយមើលឃើញបញ្ហានេះ ទើបអង្គការឈ្មោះ Health Care for All (អង្គការសេវាថែទាំសុខភាពសម្រាប់គ្រប់គ្នា) បានរួមសហការជាមួយនឹងអង្គការ, សមាគមអ្នកជំនួញ, និងសមាគមផ្តល់សេវាក្នុងសហគមន៍ចំនួន១០ ដើម្បីផ្សព្វផ្សាយគុណយោជន៍នៃច្បាប់ថ្មីនេះ ទៅដល់ប្រជាជនចំនួន៤០០០០នៅក្នុងរដ្ឋម៉ាស្សាឈូសិត ។ ក្នុងចំណោមអង្គការទាំងនោះ សមាគមខ្មែរ (Cambodian Mutual Assistance Association) នៅទីក្រុងឡូវែលក៏ត្រូវបានជ្រើសរើសឱ្យចូលរួមចំណែកនៅក្នុងកិច្ចខិតខំប្រឹងប្រែង ដើម្បីផ្សព្វផ្សាយព័ត៌មានអំពីផលប្រយោជន៍នៃច្បាប់ថ្មីនេះដល់ប្រជាជនរស់នៅទីក្រុងឡូវែលឱ្យចុះឈ្មោះដើម្បីទទួលបានការធានារ៉ាប់រងសុខភាព ។

តទៅទំព័រទី ២០

# CANVASSING: LAST EFFORT TO HAVE LOWELL'S RESIDENTS INSURED

"National Health Reform, the Affordable Care Act extended period for enrolling in the health insurance plan will expire in less than 100 days"

*By Visal Chin, MPH*
*January 20, 2014*

The Affordable Care Act set forth universal standars of health insurance coverage for all people in the U.S. Despite the fact that more than 98 percent of people in Massachusetts are insured in one form or another, hundred thousands of Massachusetts's residents are uninsured according to the Massachusetts Health Insurance Survey in 2010. Particularly, a great number of Lowell's residents do not enroll in the health insurance or are not aware of many benefits brought in by the national health reform. Given these issues, the Health Care for All, a consumer advocate organization, collaborates with 10 local nonprofits, business associations and community-based organizations to disseminate information about benefits of the new health care law to 40,000 residents of Massachusetts. Among those 10 organizations, the Cambodian Mutual Assistance Association (CMAA) in the Greater Lowell also partners to partake in this endeavor to spread out information about benefits of the new health care law to residents of Lowell.

CMAA anncouced it's canvassers are tasked to go door-to-door to residents' homes to inform residents about benefits of enrolling in the health insurance plan. CMAA's canvassers goal is to reach 5,000 homes of Lowell's residents, including Cambodians and other ethnic minorities.

The residents may share with the canvasers about their current health insurance plans, hospitals, or health clinics so that your opinions maybe heard by legislators at the state and national level.

The CMAA canvassers will carry with them lists of target population. The lists were provided by the Health Care for All organization to the canvassers compare residents' names with the actual people living in the house. **Continued to page 20**

# សិទ្ធិបោះឆ្នោតនៅអាយុ១៧ឆ្នាំ

## Vote 17 scores a victory in the Senate

**ឡូវែល** ៖ ក្រុមយុវជនបានខិតខំបញ្ចុះបញ្ចូលអ្នកធ្វើច្បាប់ ដើម្បីឱ្យយុវជនអាយុ១៧ឆ្នាំអាចបោះឆ្នោតនៅទីក្រុងឡូវែលបានតាំងតែពីឆ្នាំ២០០៩មកម្លេះ ។ នៅសប្តាហ៍មុននេះនៅក្នុងកញ្ចប់នៃការកែទម្រង់វិធីបោះឆ្នោតរបស់ព្រឹទ្ធសភាសមាជិកអេលីន ដុនឃូ សភាបាន ទទួលអនុម័ត ហើយបញ្ចូលទៅស្ថាប័នបន្ទាប់មុននឹងធ្លាក់ទៅដល់ដៃចៅហ្វាយរដ្ឋម៉ាសាឈូសែតចុះហត្ថលេខាឱ្យក្លាយជាច្បាប់ ។

នេះជាជោគជ័យដ៏សំខាន់របស់ក្រុមយុវជនអង្គការ "យូតិក"ដែលទទួលបានលទ្ធផលប្រសើរពីក្រុមអ្នកធ្វើច្បាប់។ នៅពេលច្បាប់នេះបានសម្រេចហើយ និងមានការបោះឆ្នោតប្រជាមតិមួយទៀត សម្រាប់ឱ្យពលរដ្ឋទូទៅបញ្ចេញមតិទទួលយល់ព្រមពីក្រុងឡូវែលមុននឹងយុវជនអាយុ១៧ឆ្នាំមានសិទ្ធិពេញលេញ និងបោះឆ្នោតក៏រិតក្រុងរបស់ខ្លួនបាន ៕

*By James Ostis*

With its storied history, Lowell is known as a city of firsts-and if the hard work of local teenage activists pays off, the city will be making history again by becoming the first city in the Commonwealth of Massachusetts to grant 17-year-olds the right to vote in municipal elections. Last week during negotiations on electoral reforms Senator Eileen Donoghue's amendment containing the language to the Senate electoral reform package was approved by the Senate. The amended bill still needs to be approved in the House and signed by the governor before it becomes law, but the Senate passage marks the effort's biggest legislative victory to date.



Carlinee Kirksey and Susan Le



Eileen Donoghue

Lowell youth organizer Carline Kirksey knows the work continues, "Our story is not finished. We will continue to advocate for this initiative and we have not, and will not give up. We are thankful that Senator Donoghue has continued the effort as well and we look forward to getting our effort included in the Conference Committee's final version and eventually, signed by the Governor." **Continued to page 17**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំនាញខាងប្រែសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី០៩ ខែមករា ឆ្នាំ២០១៣

# លោក ហ៊ុន សែន អំពាវនាវឱ្យអ្នកគាំទ្របក្សប្រជាជន ក្រោកឈរដើម្បីការពាររដ្ឋាភិបាលរបស់លោក

***ដោយ*** ***Hul Reaksmey - January 20, 2014***

ថ្លែងនៅរយៈពេលពីរសប្តាហ៍?បន្ទាប់ពីបង្ក្រាបបាតុកម្មរបស់គណបក្សប្រឆាំងដែលទាមទារឱ្យលោកចុះចេញពីអំណាច លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន កាលពីថ្ងៃសៅរ៍បានអំពាវនាវឱ្យអ្នកគាំទ្រគណបក្សប្រជាជនកម្ពុជាកំពុងកាន់អំណាចរបស់លោកត្រៀមខ្លួនក្រោកឈរឡើងប្រឆាំងជាមួយក្រុមប៉ុនប៉ងទម្លាក់រដ្ឋាភិបាលរបស់លោក។

លោក ហ៊ុន សែន បានមានប្រសាសន៍អំឡុងពិធីសម្ពោធដាក់ឱ្យប្រើប្រាស់មណ្ឌលកុមារកំព្រាមួយកន្លែងនៅក្នុងខេត្តក្រចេះថា "សូមបងប្អូនទាំងអស់ដែលបានបោះឆ្នោតគាំទ្រគណបក្សប្រជាជនកម្ពុជាត្រៀមខ្លួនក្រោកឈរឡើងប្រឆាំងគ្រប់សកម្មភាពទាំងអស់ដែលខ្វះការទទួលខុសត្រូវ និងមានលក្ខណៈជារដ្ឋប្រហារ"។

លោកបានមានប្រសាសន៍ថា "ការមានបំណងទម្លាក់រដ្ឋាភិបាលឱ្យរបស់ខ្ញុំមិនអាចទទួលយកបានឡើយ"។ លោកបានលើកឡើងទៀតថា នរណាក៏ដោយដែលព្យាយាមប្រឆាំងនឹងការដឹកនាំប្រ-ទេសរបស់លោកនឹងមិនត្រូវ "អត់ឱន" ឱ្យឡើយ។ លោកក៏បានមានប្រសាសន៍ដែរថា ប្រសិនបើអ្នកគាំទ្រគណបក្សប្រជាជនកម្ពុជារបស់លោកសម្រេចចិត្តចេញមកតវ៉ានៅតាមដងផ្លូវ ពួកគេគួរតែ



រូបរួមកម្លាំងគ្នា។

លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានមានប្រសាសន៍ទៀតថា "ពីមុនគណបក្សប្រជាជនកម្ពុជាមិនបានប្រើប្រាស់កម្លាំងអ្នកគាំទ្រ និងសមាជិករបស់ខ្លួន ឱ្យដើម្បីទប់ទល់នឹងបាតុកម្មរបស់គណបក្ស

# Hun Sen Calls On CPP Voters To Defend His Government

***By Hul Reaksmey - January 20, 2014***

Speaking two weeks after crushing opposition party demonstrations demanding his resignation, Prime Minister Hun Sen on Saturday called on supporters of his ruling CPP to prepare to stand up against any group aiming to overthrow his government.

"All of you who voted for the CPP, be ready to oppose all acts that lack responsibility and have the characteristics of a coup," Mr. Hun Sen said during a ceremony marking the opening of an orphanage in Kratie province.

"Having the intention to overthrow [my government] cannot be accepted," he said, adding that anybody who wished to challenge his rule would not be "spared."

Mr. Hun Sen also said that if his CPP supporters did decide to come onto the street, they should turn out in force.

"Previously, the CPP didn't use the force of its supporters and members [to counter opposition demonstrations], and some people said that if the CPP comes out, there will not be so many people-like a handful of monkeys," he said.

"Do you want to know or try a taste? " the prime minister asked.

"If Hun Sen comes out to do something, it's not going to be small," he said. "Action will be taken when it's time to do it, so be clear about that. That's not a threat, it's the implementation of the law."

On January 4, Mr. Hun Sen's government sent civilian thugs --armed with metal bars, axes and batons--into Phnom Penh's Freedom Park to clear away supporters of the opposition CNRP, including monks, who had been camped out there for two weeks to demand an investigation of July's contested national election.

The opposition's marches and demonstrations grew in size after merging with protests by garment factory workers

**Continued to page 25**

# លោក បារ៉ាក់ អូបាម៉ា ចុះហត្ថលេខាលើសេចក្តីព្រាងថវិកាដែលផ្អាកការផ្តល់មូលនិធិដល់រដ្ឋាភិបាល

ដោយ Alex Willemyns - January 20, 2014

កាលពីថ្ងៃសុក្រលោកប្រធានាធិបតីសហរដ្ឋអាមេរិក បារ៉ាក់ អូបាម៉ា (Barack Obama) បានចុះហត្ថលេខាលើសេចក្តីព្រាងថវិកាចំណាយមួយដែលមានចែងអំពីការផ្អាកការផ្តល់មូលនិធិខ្លះដល់រដ្ឋាភិបាលរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន រហូតទាល់តែមានអនុវត្តប្រតិបត្តិការស៊ើបអង្កេតឯករាជ្យទៅលើការបោះឆ្នោតជាតិដ៏ចម្រូងចម្រាសកាលពីឆ្នាំមុន ឬក៏រហូតទាល់តែគណបក្សសង្គ្រោះជាតិឈប់ធ្វើពហិការសភា។

សេចក្តីព្រាងថវិកានេះមានគោលដៅតែផ្នែកតូចមួយ ពោលគឺមានតែថវិកា៨០លានដុល្លារក្នុងមួយឆ្នាំប៉ុណ្ណោះ សម្រាប់ផ្តល់ឱ្យប្រទេសកម្ពុជាតាមរយៈរដ្ឋាភិបាលដោយផ្ទាល់។ ទោះបីជាយ៉ាងណា មូលនិធិផ្សេងៗទៀតគឺជាមូលនិធិជំនួយមនុស្សធម៌ និងមូលនិធិសម្រាប់ការបណ្តុះបណ្តាលអំពីសិទ្ធិមនុស្សដល់កងយោធពលខេមរភូមិន្ទ។

សេចក្តីព្រាងថវិកានេះបង្ហាញថា ជំនួយនេះនឹងត្រូវកាត់ពីរដ្ឋាភិបាលរបស់លោក ហ៊ុន សែន រហូតទាល់តែលោក ចន ឃែរី (John Kerry) រដ្ឋមន្ត្រីក្រសួងការបរទេសសហរដ្ឋអាមេរិកបានបញ្ជាក់ថា "រដ្ឋាភិបាលកំពុងតែរៀបចំ និងអនុវត្តការស៊ើបអង្កេតឯករាជ្យ និងគួរទុកចិត្តមួយទៅលើភាពមិនប្រក្រតីពាក់ព័ន្ធនឹងការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រកាលពីថ្ងៃទី២៨ ខែកក្កដា ឆ្នាំ២០១៣ ដោយមានការឯកភាពពីគណបក្សប្រឆាំងនៅក្នុងប្រទេសកម្ពុជា ឬរហូតទាល់តែគណបក្សសង្គ្រោះជាតិទទួលយកអាសនៈរបស់ខ្លួន។

លោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំងបានស្វាគមន៍សេចក្តីព្រាងថវិកានេះ ដោយលើកឡើងថា ខណៈដែលជំនួយចំនួនតិចតួចប៉ុណ្ណោះបានកំពុងដកចេញ រដ្ឋាភិបាលរបស់គណបក្សប្រជាជនកម្ពុជាអាចនឹងមើលឃើញ គំរូនៃការកាត់ផ្តាច់ជំនួយនេះ។

លោក សម រង្ស៊ី បានមានប្រសាសន៍ថា "នេះបង្ហាញពីភាពអាម៉ាស់របស់លោក ហ៊ុន សែន ហើយភាពអាម៉ាស់មានសារៈសំខាន់ជាងប្រាក់ទៅទៀត ពោលគឺវារួមចំណែកយ៉ាងច្រើនក្នុងការបញ្ជាក់ពីភាពមិនស្របច្បាប់នៃរបបរបស់លោក ហ៊ុន សែន ។

លោកបានបន្តថា "លោក ហ៊ុន សែន... ខ្លាចទិដ្ឋភាពឯកោពីអន្តរជាតិជាងអ្នកផ្សេងទៀតនៅក្នុងប្រទេសកម្ពុជា។? ពេលនេះរបបរបស់គាត់ប្រឈមនឹងបញ្ហាផ្លូវច្បាប់"។

លោក ស៊ាន ម៉ាឃីនតុស (Sean McIntosh) អ្នកនាំពាក្យស្ថានទូតអាមេរិកមិនបញ្ជាក់ថា តើ

**តទៅទំព័រទី ២១**

# Obama Signs Off on Aid Cuts to Government

*By Alex Willemyns - January 20, 2014*

U.S. President Barack Obama on Friday signed a spending bill that suspends some funding to Prime Minister Hun Sen's government until an independent investigation into last year's disputed national election is carried out, or until the opposition CNRP ends its boycott of parliament.

The bill targets only a small portion of the U.S.' $80-million a year in aid to Cambodia that goes straight to the Cambodian government. Excluded from the suspension, however, is anything that falls under humanitarian aid, and human rights training for the Royal Cambodian Armed Forces.

The aid will be withheld from Mr. Hun Sen's government until U.S. Secretary of State John Kerry certifies that the "government is conducting and implementing, with the concurrence of the political opposition in Cambodia, an independent and credible investigation into irregularities associated with the July 28, 2013 parliamentary elections," or until the CNRP takes it seats, the bill states.

Opposition leader Sam Rainsy welcomed the bill, saying that while only a small amount of aid was being withheld, the CPP government would feel the symbolism of the cut.

"This represents a slap on the face of Hun Sen, and the slap is more important than any amount of money-it contributes much to delegitimize the regime of Hun Sen," Mr. Rainsy said.

"Mr. Hun Sen…dreads the prospect of international isolation more than anyone else in Cambodia. Now his regime faces a legitimacy problem."

U.S. Embassy spokesman Sean McIntosh would not specify how much aid money the spending bill will withhold.

"We continue to support a transparent investigation into reported irregularities with the July 2013 national elections and the implementation of reforms that will ensure credible elections moving forward," he said in an email, reiterating that U.S. aid cuts will not directly impact Cambodian citizens.

"The restrictions will have virtually no impact on our humanitarian assistance and other programs that directly benefit the Cambodian people."

Ek Tha, spokesman for the Council of Ministers' Press and Quick Reaction Unit, said the CPP had won the election fairly and called for caution in cutting aid.

"We are calling for donors, friends who are near and far, not to reduce aid or cut aid to Cambodia because the Cambodian people, we need donor support to develop this country," he said.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំនឿចម្រើនពីការសាសអច់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី០៩ ខែមករា ឆ្នាំ២០១៣

## ក្រុមហ៊ុនបរទេសជំរុញឱ្យមានការស៊ើបអង្កេតការបាញ់សម្លាប់កម្មករ

*ដោយ Zsombor Peter - January 20, 2014*

សហព័ន្ធសហជីពអន្តរជាតិ និងក្រុមហ៊ុនលំដាប់ពិភពលោកសរុប៣០ ដូចជា វ៉ាល់ឌីស្នី (Walt Disney) វ៉លម៉ាត (Walmart) និងក្រុមហ៊ុន ហ្គេប (Gap) ជាដើមបានសរសេរលិខិតផ្ញើជូនលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន កាលពីថ្ងៃសុក្រ ដើម្បីបង្ហាញក្តីបារម្ភរបស់ខ្លួនអំពីករណីបាញ់សម្លាប់យ៉ាងសាហាវទៅលើកម្មកររោងចក្រកាត់ដេរប្រាំនាក់ កាលពីដើមខែនេះបន្ទាប់ពីខ្លួនបានពិចារណាយ៉ាងដិតដល់។

លើសពីនេះទៀត សហព័ន្ធសហជីព និងក្រុមហ៊ុនទាំងនេះ បានអំពាវនាវឱ្យមានការស៊ើបអង្កេតជាបន្ទាន់ទៅលើករណីបាញ់សម្លាប់នេះ ព្រមទាំងអំពាវនាវឱ្យមានជំនួបមួយជាមួយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន។

នៅក្នុងលិខិតរួមមួយច្បាប់ដែលត្រូវបានសរសេរផ្ញើជូនដោយផ្ទាល់ចំពោះ លោក ហ៊ុន សែន សហព័ន្ធសហជីព និងក្រុមហ៊ុនទាំងនេះក៏បានជំរុញឱ្យរដ្ឋាភិបាលគោរពសិទ្ធិរបស់មេដឹកនាំសហជីពកម្មកររោងចក្រកាត់ដេរ និងអ្នកតវ៉ាសរុប២៣នាក់ដែលត្រូវបានចាប់ខ្លួន កាលពីដើមខែនេះ អំឡុងសកម្មភាពតវ៉ាទាមទារប្រាក់ឈ្នួលអប្បបរមាខ្ពស់ជាងមុននៅក្នុងវិស័យកាត់ដេរនៃប្រទេសកម្ពុជា។

កូដកម្មទូទាំងប្រទេសរយៈពេលប៉ុន្មានថ្ងៃធ្វើឡើងដោយកម្មកររោងចក្រកាត់ដេរ បានបញ្ចប់ទៅដោយមានអំពើហិង្សាកើតឡើង និងនៅពេលកម្លាំងកងរាជអាវុធហត្ថបាញ់ទៅលើក្រុមអ្នកតវ៉ាដែលបានគប់ដុំថ្មនៅខាងក្រៅរោងចក្រមួយក្នុងរាជធានីភ្នំពេញជាហេតុបណ្តាលឱ្យមនុស្សប្រាំនាក់ស្លាប់ និងជាង៤០នាក់ផ្សេងទៀតរងរបួស។

សហជីព និងក្រុមហ៊ុនទាំងនោះបានលើកឡើងក្នុងលិខិតរបស់ខ្លួនផ្ញើជូនលោក ហ៊ុន សែន ថា "ការប្រើប្រាស់កម្លាំងដែលបណ្តាលឱ្យមានមនុស្សស្លាប់ទៅលើកម្មករតវ៉ា និងមិននាំឱ្យមានសន្តិភាពរយៈពេលវែងសម្រាប់វិស័យឧស្សាហកម្មទេ ហើយថែមទាំងធ្វើឱ្យមានបញ្ហាដល់កេរ្តិ៍ឈ្មោះរបស់ប្រទេសកម្ពុជាដែលជាទីតាំងផ្គត់ផ្គង់យ៉ាងមានស្ថិរភាពសម្រាប់ក្រុមហ៊ុនអន្តរជាតិទៀតផង"។ តទៅទំព័រទី១៤

## International Brands Seek Probe Into Protest Killings

*By Zsombor Peter - January 20, 2014*

Thirty international union federations and global brands, including Walt Disney, Wal-Mart and Gap, wrote to Prime Minister Hun Sen on Friday expressing "grave concern" over the fatal shooting of five garment workers this month and calling for an immediate investigation into the killings, as well as a meeting with the premier.

In a joint letter addressed directly to Mr. Hun Sen, they also urged the government to "respect the rights" of the 23 union leaders, garment workers and protesters arrested earlier this month during protests demanding a higher minimum wage in the country's garment sector.

Several days of nationwide strikes by garment workers came to a violent end when military police shot into crowds of stone-throwing protesters outside a Phnom Penh factory on January 3, killing five and wounding more than 40.

"The use of deadly force against protesting workers will not result in long-term industrial peace and jeopardizes Cambodia's position as a stable sourcing location for international brands," the unions and brands said in their letter to Mr. Hun Sen.

The letter also backed a call from the U.N.'s human rights envoy to Cambodia, Surya Subedi, for a prompt investigation of the killings.

"The investigation should ensure full accountability of any members of security forces found to have used disproportionate and excessive force and to take measures to prevent the repetition of such acts," they added.

They also called on the government to respect freedom of association, which the Interior Ministry indefinitely suspended a day after the protest killings, and to immediately resume negotiations with the local unions and garment workers to settle their dispute.

"The global garment industry is changing rapidly and industrial peace is required to rebuild our confidence in the Cambodian garment industry," the letter says. "We respectfully request that Samdech [Mr. Hun Sen] meet with senior

**Continued to Page 15**

## សេចក្តីសម្រេចរបស់សហភាពអឺរ៉ុប ជាសញ្ញាដ៏សំខាន់មួយសម្រាប់រដ្ឋាភិបាល

*ដោយ Alex Willemyns - January 20, 2014*

លោកស្រី មូរ សុខហួរ តំណាងរាស្ត្រជាប់ឆ្នោតមកពីគណបក្សប្រឆាំងបានឱ្យដឹងកាលពីម្សិលមិញថា គណបក្សសង្គ្រោះជាតិនឹងរក្សាទំនាក់ទំនងជិតស្និទ្ធជាមួយមន្ត្រីសហភាពអឺរ៉ុបដើម្បីធានាថា សេចក្តីសម្រេចកាលពីថ្ងៃព្រហស្បតិ៍ដោយបានអំពាវនាវឱ្យមានការស៊ើបអង្កេតការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រកាលពីខែកក្កដា និងការបាញ់សម្លាប់អ្នកតវ៉ាប្រាំនាក់ក្នុងខែនេះ នឹងមានសកម្មភាពជាក់ស្តែង។

សភារបស់សហភាពអឺរ៉ុបបានអនុម័តសេចក្តីសម្រេចក្នុងការអំពាវនាវឱ្យរដ្ឋាភិបាលរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ធ្វើការស៊ើបអង្កេតឯករាជ្យមួយ និងការស៊ើបអង្កេតដឹកនាំដោយអន្តរជាតិលើការបោះឆ្នោតដែលមានជម្លោះកាលពីខែកក្កដាឆ្នាំមុន?និងការសម្លាប់កម្មកររោងចក្រកាត់ដេរប្រាំនាក់ និងធ្វើឱ្យជាង៤០នាក់ផ្សេងទៀតរងរបួស កាលពីថ្ងៃទី៣ ខែនេះ។

លោក ស្រី មូរ សុខហួរ មានប្រសាសន៍ ថា "យើងគាំទ្រសភាអឺរ៉ុបយ៉ាងខ្លាំងហើយ យើងនឹងរក្សាទំនាក់ទំនងយ៉ាងជិតស្និទ្ធជាមួយសហគមន៍អន្តរជាតិដែលមានការទទួលខុសត្រូវ ចំពោះកាតព្វកិច្ចរបស់ខ្លួន ។ លោកស្រីបានលើកឡើងបន្តថា ការកាត់ជំនួយសម្រាប់ប្រទេសកម្ពុជាអាចជាជម្រើសមួយសម្រាប់សហភាពអឺរ៉ុបដែលជាម្ចាស់ជំនួយដ៏ធំបំផុតតែមួយគត់របស់ប្រទេសកម្ពុជា។

លោកស្រីបានមានប្រសាសន៍ថា "យើងមិនចាត់ទុករដ្ឋាភិបាលនេះជារដ្ឋាភិបាលស្របច្បាប់ទេ ហើយវាជាសំណួរទាក់ទងនឹងភាពស្របច្បាប់។ ជំនួយមិនគួរត្រូវបានបែងចែកដោយឆ្លងកាត់រដ្ឋាភិបាលមិនស្របច្បាប់ទេ ហើយកិច្ចខិតខំប្រឹងប្រែងបែបនេះធ្វើឡើង ក្នុងគោលបំណងលើកស្ទួយភាពស្របច្បាប់របស់រដ្ឋាភិបាល តាមរយៈការបោះឆ្នោតឡើងវិញ"។

លោក ឯក ថា អ្នកនាំពាក្យរបស់អង្គភាពព័ត៌មាននិងប្រតិកម្មរហ័សនៅទីស្តីការគណៈរដ្ឋមន្ត្រី

តទៅទំព័រទី ១៧

## CNRP Says EU Resolution a Strong Signal to Government

*By Alex Willemyns - January 20, 2014*

The CNRP will stay in close contact with European Union (E.U.) officials to ensure a resolution on Thursday, which calls for an investigation into July's national election and this month's slaying of five protesters, will be followed up with action, opposition lawmaker-elect Mu Sochua said Sunday.

The European Parliament passed the resolution calling on Prime Minister Hun Sen's government to conduct an independent and internationally-led investigation into last July's contested election and the killing of five garment factory protesters, and the wounding of more than 40 others, on January 3.

"We have very strong support in the E.U. Parliament and we will stay in close contact to hold the international community, as a whole, accountable to its obligations," Ms. Sochua said.

Cutting aid to Cambodia might be an option for the E.U., which is Cambodia's largest single aid donor, Ms. Sochua said.

"We don't consider this government legitimate, and it is a question of legitimacy. Aid should not be channeled through a government that is not legitimate, and so efforts must be made to restore legitimacy to the government through re-election," she said.

Ek Tha, spokesperson for the Council of Ministers' Press and Quick Reaction Unit, said that the CPP government hoped the E.U. would appreciate the government's announcement to investigate the killings of protesters, and not consider cuts to aid.

"On the incident of January 3, the government has an investigation team and an investigation will take place," Mr. Tha said.

"Cambodians ask donors not to cut donor aid to Cambodia, because we need friendly nations to support us. The Cambodian people have gone through so much pain already for 30 years," he said.

E.U. Ambassador Jean-Francois Cautain did not respond to requests for comment Sunday.

**Continued to page 21**

តមកពីទំព័រទី ១៣

## ក្រុមហ៊ុនបរទេសជំរុញឱ្យមានការស៊ើប...

លិខិតនេះក៏បានបង្ហាញការគាំទ្រសេចក្តីអំពាវនាវពីសំណាក់ប្រេសិតពិសេសទទួលបន្ទុកសិទ្ធិមនុស្សរបស់អង្គការសហប្រជាជាតិដែលបានធ្វើទស្សនកិច្ចមកកាន់ប្រទេសកម្ពុជា គឺលោក សុរិយា ស៊ូបេឌី (Surya?Subedi) ដែលបានជំរុញឱ្យមានការស៊ើបអង្កេតដ៏ស៊ីជម្រៅមួយលើករណីបាញ់សម្លាប់កម្មកររោងចក្រកាត់ដេរនេះ ។

សហជីព និងក្រុមហ៊ុនទាំងនោះបានលើកឡើងបន្ថែមទៀតថា "ការស៊ើបអង្កេតគួរតែធានាឱ្យមានការទទួលខុសត្រូវពេញលេញពីកម្លាំងសន្តិសុខគ្រប់រូបដែលត្រូវបានរកឃើញថា បានប្រើកម្លាំងមិនសមរម្យ និងហួសកម្រិត និងបានចាត់វិធានការការពារមិនឱ្យមានអំពើបែបនេះកើតឡើងជាថ្មីម្តងទៀត" ។

សហជីពនិងក្រុមហ៊ុនទាំងនោះបានអំពាវនាវឱ្យរដ្ឋាភិបាលគោរពសិទ្ធិសេរីភាពនៃការបង្កើតសមាគមដែលក្រសួងមហាផ្ទៃបានព្យួរដោយគ្មានពេលកំណត់បន្ទាប់ពីសកម្មភាពបាញ់សម្លាប់កើតឡើងបានមួយថ្ងៃ និងអំពាវនាវឱ្យមានការចរចាឡើងវិញជាបន្ទាន់រវាងរដ្ឋាភិបាលជាមួយសហជីពក្នុងស្រុក និងកម្មកររោងចក្រកាត់ដេរ ដើម្បីដោះស្រាយវិវាទរបស់ភាគីទាំងនេះ ។

លិខិតដដែលមានខ្លឹមសារបន្តទៀតថា "វិស័យកាត់ដេរទូទាំងសាកលលោកកំពុងប្រែប្រួលយ៉ាងលឿន ហើយចាំបាច់ត្រូវមានសន្តិភាពនៅក្នុងវិស័យនេះ ដើម្បីកសាងទំនុកចិត្តរបស់យើងឡើងវិញទៅ លើវិស័យកាត់ដេរនៅប្រទេសកម្ពុជា ។ យើងសូមស្នើដោយការគោរពដ៏ខ្ពង់ខ្ពស់ឱ្យសម្តេចឱ្យលោក ហ៊ុន សែន ជួបពិភាក្សាជាមួយតំណាងជាន់ខ្ពស់របស់យើងនៅថ្ងៃទី៣ ខែកុម្ភៈ ឆ្នាំ២០១៤ ដើម្បីពិភាក្សាគ្នាថា តើយើងអាចជួយសម្រេចឱ្យសម្រេចបាននូវគោលបំណងខាងលើដោយរបៀបណា" ។

តំណាងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន មិនអាចទំនាក់ទំនងធ្វើសេចក្តីអត្ថាធិប្បាយបានទេ កាលពីម្សិលមិញ ។

សហព័ន្ធសហជីព និងក្រុមហ៊ុនអន្តរជាតិទាំងនោះបានផ្ញើលិខិតរបស់ខ្លួនមកកាលពីថ្ងៃសុក្រ បន្ទាប់ពីមានលិខិតមួយច្បាប់ផ្សេងទៀតត្រូវបានផ្ញើចេញពីសមាគមពាណិជ្ជកម្មប្រាំមួយកាលពីថ្ងៃពុធសប្តាហ៍មុន ។ គួរបញ្ជាក់ថា សមាជិកសមាគមទាំងនេះបានចូលរួមចំណែក៩០ភាគរយនៃបរិមាណផលិតផលសម្លៀកបំពាក់ និងស្បែកជើងដែលត្រូវបាននាំចូលដោយប្រទេសកាណាដា និងសហរដ្ឋអាមេរិក ។

លិខិតដដែលក៏បានអំពាវនាវឱ្យមិនត្រឹមតែលោក ហ៊ុន សែន ប៉ុណ្ណោះទេ ថែមទាំងសហជីពដែលនៅពីក្រោយកូដកម្ម និងសមាគមរោងចក្រកាត់ដេរនៅកម្ពុជា (GMAC) ឱ្យបញ្ឈប់អំពើហិង្សាទាំងអស់ត្រឡប់ទៅរកតុចរចាវិញ និងបង្កើតផែនការពិនិត្យប្រាក់ឈ្នួលអប្បបរមាឱ្យបានឆាប់តាមលទ្ធភាពដែលអាចធ្វើទៅបាន ។

នៅក្នុងសេចក្តីថ្លែងការណ៍មួយចេញផ្សាយកាលពីម្សិលមិញគណបក្សសង្គ្រោះជាតិដែលបានគាំទ្រការទាមទារប្រាក់ឈ្នួលអប្បបរមា១៦០ដុល្លារក្នុងមួយខែពីសំណាក់សហជីពដែលនៅពីក្រោយកូដកម្មបានថ្លែងអំណរគុណក្រុមហ៊ុនអន្តរជាតិទាំងនោះដែលបានបញ្ចេញមតិរបស់ខ្លួន ។

គណបក្សសង្គ្រោះជាតិបានលើកឡើងនៅក្នុងសេចក្តីថ្លែងការណ៍នោះថា "ដំណោះស្រាយអាចរកឃើញតែនៅពេលកម្មករ និងនយោជកអាចចរចាគ្នាក្នុងស្មារតីជឿជាក់រឹងមាំមិនមែននៅក្នុងបរិស្ថានមួយដែលអនុញ្ញាតឱ្យមានការប្រើប្រាស់អំពើហិង្សាការគំរាមកំហែង និងប្រព័ន្ធយុត្តិធម៌ប្រកបដោយអំពើពុករលួយដែលដាក់ទោសទៅលើមេដឹកនាំសហជីពក្រោកឈរឡើង ដើម្បីយុត្តិធម៌នោះទេ" ។

ខណៈដែលសហជីព និងក្រុមហ៊ុនអន្តរជាតិទាំងនោះ មិនបានលើកឡើងអំពីប្រាក់ឈ្នួលអប្បបរមា១៦០ដុល្លារក្នុងមួយខែដែលសហជីពក្នុងស្រុកកំពុងទាមទារលិខិតរបស់ពួកគេ និងដាក់សម្ពាធទៅលើរដ្ឋាភិបាល និងរោងចក្រឱ្យយល់ព្រមនេះបើតាមប្រសាសន៍របស់លោក រ៉ុង ឈុន ប្រធានសហព័ន្ធសហជីពកម្ពុជាដែលស្ថិតក្នុងចំណោមសហជីពនៅពីក្រោយកូដកម្មទាមទារប្រាក់ឈ្នួលនេះ ។

លោកបានមានប្រសាសន៍ថា "យើងមានសុទិដ្ឋិនិយមថា លិខិតរបស់អតិថិជនទាំងនេះនៅពេលនេះអាចជំរុញឱ្យនិយោជកអនុវត្តតាមការទាមទាររបស់យើង ពីព្រោះពួកគេឱ្យក្រុមហ៊ុនអន្តរជាតិទាំងនោះដឹងថា អ្នកជំនួញទាំងនោះអាចដំឡើងប្រាក់ឈ្នួលដល់១៦០ដុល្លារបាន" ។

សហជីពកំពុងគំរាមធ្វើកូដកម្មទូទាំងប្រទេសបន្តទៀត ប្រសិនបើរដ្ឋាភិបាលមិនចាប់ផ្តើមការចរចាអំពីប្រាក់ឈ្នួលឡើងវិញនាពេលឆាប់ៗទេនោះ ។

លោក ហ៊ុន សែន បានចាត់តាំងលោកឧបនាយករដ្ឋមន្ត្រី គាត ឈន់ ឱ្យទទួលបន្ទុកគណៈកម្មាធិការថ្មីមួយដែលត្រូវសិក្សាអំពីលទ្ធភាពក្នុងការដំឡើងប្រាក់ឈ្នួលអប្បបរមាឱ្យខ្ពស់ជាង១០០ដុល្លារសម្រាប់វិស័យកាត់ដេរ ក៏ប៉ុន្តែតាំងពីពេលនោះមកមិនទាន់មានដំណឹងទាក់ទងទៅនឹងគណៈកម្មាធិការនេះទេ ។ គួររំឭកថា ប្រាក់ឈ្នួលអប្បបរមា១០០ដុល្លារនេះត្រូវបានអនុម័តកាលពីថ្ងៃទី១០ខែនេះ ។

ក្នុងថ្ងៃចាត់តាំងលោក គាត ឈន់ លោក ហ៊ុន សែន ក៏បានចាត់តាំងលោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃឱ្យទទួលបន្ទុកគម្រោងស្រាវជ្រាវអំពីករណីប៉ះទង្គិចគ្នារវាងក្រុមអ្នកតវ៉ា និងនគរបាលដែលបានបញ្ចប់ទៅដោយមានការបាញ់សម្លាប់កម្មករប្រាំនាក់ ។ ក៏ប៉ុន្តែមិនទាន់មានដំណឹងទាក់ទងនឹងគម្រោងស្រាវជ្រាវនេះទេ ។

ទោះជាយ៉ាងណាថ្លែងអំពីវិវាទការងារទាំងនេះនៅក្នុងសុន្ទរកថាមួយកាលពីសប្តាហ៍មុនលោក ហ៊ុន សែន បានលើកឡើងថា ការទាមទាររបស់សហជីពឱ្យមានការដំឡើងប្រាក់ឈ្នួលអប្បបរមាដល់១៦០ដុល្លារជាបន្ទាន់នោះ គឺជារឿងមិនអាចទៅរួចទេ ។

រដ្ឋាភិបាលនិងរោងចក្របានលើកឡើងថា ការដំឡើងប្រាក់ឈ្នួលអប្បបរមាទ្វេដងភ្លាមៗអាចនឹងជំរុញឱ្យក្រុមហ៊ុនជាច្រើនដែលបច្ចុប្បន្នកំពុងទិញទំនិញពីរោងចក្រនៃកម្ពុជាឱ្យរិះរកប្រទេសផ្សេងដែលមានថ្លៃដើមកម្លាំងពលកម្មថោកជាង ។

លោក កែន លូ អគ្គលេខាធិការសមាគម GMAC បានលើកឡើងកាលពីម្សិលមិញថា លិខិតកាលពីថ្ងៃសុក្រដែលផ្ញើមកពីសហជីព និងក្រុមហ៊ុនអន្តរជាតិមានខ្លឹមសារស៊ីគ្នាទៅនឹងខ្លឹមសាររបស់រោងចក្រក្នុងស្រុក ។ លោកបានមានប្រសាសន៍ថា "យើងតែងតែថ្កោលទោសការប្រើប្រាស់អំពើហិង្សានៅក្នុងវិវាទឧស្សាហកម្ម... ដូច្នេះនឹងមានខ្លឹមសារខុសគ្នានៅក្នុងលិខិតនោះទេ" ។

លោក កែន លូ ក៏បានស្វាគមន៍សេចក្តីអំពាវនាវរបស់សហជីព និងក្រុមហ៊ុនអន្តរជាតិទាំងនោះឱ្យមាន "វិធានការព្រមាន" ទៅលើអ្នកដែលជាប់ទោសដោយសារតែបានបំផ្លាញទ្រព្យសម្បត្តិអំឡុងសកម្មភាពតវ៉ាដែលនេះអាចសំដៅទៅលើអ្នកតវ៉ាមួយចំនួនក្នុងចំណោមអ្នកតវ៉ាទាំងអស់ ។

លោកបានមានប្រសាសន៍បន្ថែមទៀតថា "ដូច្នេះនេះគឺជាលិខិតមួយច្បាប់ដែលយ៉ាងហោចណាស់ព្យាយាមមានយុត្តិធម៌ច្រើនជាងមុន ។ ទាក់ទងទៅនឹងសំណើរបស់សហជីព និងក្រុមហ៊ុនអន្តរជាតិទាំងនោះ ឱ្យមានការគោរពសិទ្ធិសេរីភាពនៃការបង្កើតសមាគមដោយលើកឡើង អំពីអនុសញ្ញា៨៧របស់អង្គការពលកម្មអន្តរជាតិ (ILO) លោក កែន លូ បានលើកឡើងថា កម្មករបានបោះបង់ចោលសិទ្ធិនោះហើយ ដោយបែរជាប្រើអំពើហិង្សាវិញ ។ លោកបានមានប្រសាសន៍ថា "ច្បាស់ណាស់កូដកម្មនិងបាតុកម្មមិនមែនធ្វើឡើងដោយសន្តិវិធីទេ... ដូច្នេះច្បាស់ណាស់អនុសញ្ញា ILO 87 មិនអាចអនុវត្តបានទេ" ។

នៅក្នុងលិខិតរបស់ខ្លួនកាលពីថ្ងៃសុក្រនោះ សហជីព និងក្រុមហ៊ុនអន្តរជាតិទាំងនោះក៏បានលើកឡើងផងដែរថា ច្បាប់សហជីពសម្រាប់ប្រទេសកម្ពុជាហួសពេលកំណត់ជាយូរមកហើយ ។

លោក កែន លូ បានលើកឡើងថា សមាគម GMAC បាននឹងកំពុងអំពាវនាវឱ្យមានច្បាប់នេះអស់រយៈពេលជាច្រើនឆ្នាំមកហើយ ៕ **សុធា**

*Continued from page 13* **International Brands Seek ...**

representatives of the undersigned in the week of 3 February 2014 to discuss how we can help you achieve the above-mentioned goals."

Representatives for the prime minister could not be reached for comment Sunday.

Friday's letter follows one sent by six trade associations-whose members account for 90 percent of the garments and footwear imported by Canada and the U.S.-on Wednesday.

That letter called on not only Mr. Hun Sen, but also the unions behind the strikes and the Garment Manufacturers Association in Cambodia (GMAC), to cease all violence, return to the negotiating table and set up a permanent wage-review scheme as soon as possible.

In a statement put out Sunday, the opposition CNRP, which has backed the $160 per month minimum wage demands of the unions behind the strikes, thanked the brands for speaking out.

"Resolutions can only be found when workers and employers can negotiate in good faith, not in an environment that permits the use of violence, intimidation and a corrupt judicial system that punishes union leaders standing up for justice," the CNRP said.

And while the international unions and brands do not mention the $160 monthly minimum wage the local unions are demanding, their letters will put pressure on the government and factories to agree, said Rong Chhun, president of the Cambodian Confederation of Unions, one of the groups behind the wage strikes.

"We're optimistic that the letter from the buyers this time can force the employers to implement our demands because they [the brands] know that those businessmen can raise the wage to $160," he said.

The unions are threatening to resume nationwide strikes if the government does not restart wage negotiations soon.

Mr. Hun Sen put Deputy Prime Minister Keat Chhon in charge of a new committee to study the possibility of raising the garment sector's minimum wage above the $100 presently on offer on January 10, but no news of the committee has emerged since.

The same day, Mr. Hun Sen put Interior Minister Sar Kheng in charge of a "study" of the clashes between protesters and police that ended in the fatal shootings. No news of that study has emerged, either.

Addressing the labor disputes in a speech last week, however, Mr. Hun Sen said the unions' demand for an immediate bump in the minimum wage to $160 was out of the question. The government and factories argue that immediately doubling the minimum wage would send many of the brands now buying from Cambodian factories in search of cheaper labor costs elsewhere.

GMAC secretary-general Ken Loo said Sunday that Friday's letter from the international unions and brands was essentially in line with those of local factories.

"We have always condemned the use of violence in any industrial dispute…so there's no contradiction there," he said.

Mr. Loo also welcomed their call for "punitive measures" against anyone guilty of damaging property during the protests, an apparent reference to some of the protesters.

"So this is a letter that at least tries to be more fair," he said.

As for their request that the right to freedom of association be respected, citing the International Labor Organization's (ILO) Convention 87, Mr. Loo said the strikers had forgone that right by turning violent.

"Clearly the strike and demonstration was not peaceful…so clearly the ILO Convention of 87 cannot apply," he said.

In their Friday letter, the unions and brands also say that a trade union law for Cambodia was long overdue. Mr. Loo said GMAC has been calling for just such a law for years.




# Cambodia Town

***21 Branch St., Suite 8, Lowell, MA 01851***

Cambodia Town
Board of Directors

*Dr. Sengly Kong*
*Mr. Tolayuth Ouk*
*Mr. Rotha Khai*
*Ms. Leakhena Phally*
*Mr. Vong Ros*
*Mr. Vanny Hang*
*Mr. Paul Ratha Yem*
*H.E. Sam An Um*
*Mr. Rath Mam*
*Mr. Chanbunna Taing*

**January 1, 2014**

**Dear Lowell City Councilors:**

**On behalf of the Cambodia Town Committee, I would like to extend my sincere congratulations to your being elected city councilor of Lowell. The Cambodia Town Committee looks forward to working with you over the next two years to elevate greater interests in Cambodian American businesses and cultures, attract more new investors, drive more customers to local businesses, thereby creating more new jobs in our community turning our communal vision of economically and cultural vibrant Cambodia Town one step closer to reality.**

**The fact that you are elected city councilor signifies that our community members have chosen you to represent them, to hear their voice, and to address their needs and concerns; they place their hope and trust in you and your wisdom to make positive changes in their lives and their neighborhood.**

**The Cambodia Town Committee and the Cambodian American community are fully confident in your ability to deliver and we stand ready to help you deliver on such community-based priorities as accelerated infrastructure improvements (wider sidewalk, adequate lighting, and more crime watch); establishing low interest loans to build buildings and buy homes that would ensure balanced residential and affordable housing; and other community-based initiatives.**

**On this New Year occasion, I wish you a Very Happy and Productive New Year!**

**Sincerely yours,** Best wishes!

Sengly Kong

**Sengly Kong**
**Chairman, Cambodia Town**
cambodiatown12@gmail.com

តមកទំព័រទី ៧

## សេចក្ដីសម្រេចរបស់សហភាពអឺរ៉ុប...

មានប្រសាសន៍ថា រដ្ឋាភិបាលរបស់គណបក្សប្រជាជនសង្ឃឹមថា សហភាពអឺរ៉ុបនឹងស្វាគមន៍សេចក្ដីប្រកាសរបស់រដ្ឋាភិបាលឱ្យមានការស៊ើបអង្កេតការសម្លាប់អ្នកតវ៉ា និងមិនពិចារណាការកាត់ជំនួយឡើយ ។ លោកបានឱ្យដឹងទៀតថា "ក្នុងឧបទ្ទវហេតុកាលពីថ្ងៃទី៣ខែ មករា រដ្ឋាភិបាលមានក្រុមស៊ើបអង្កេតមួយ ហើយការស៊ើបអង្កេតមួយនឹងធ្វើឡើង" ។

លោកបន្តថា "ប្រជាជនកម្ពុជាស្នើកុំឱ្យម្ចាស់ជំនួយកាត់ជំនួយដល់កម្ពុជា ពីព្រោះយើងត្រូវការប្រទេសជាមិត្តនេះគាំទ្រយើង ។ ប្រជាជនកម្ពុជាមានការឆ្លងកាត់ការឈឺចាប់ច្រើនណាស់រយៈពេល៣០ឆ្នាំហើយ" ។ លោក ហ្សង់-ហ្វ្រង់ស្វ័រ កូតេន (Jean-Francois Cautain) ឯកអគ្គរដ្ឋទូតរបស់សហភាពអឺរ៉ុបមិនបានឆ្លើយតបនឹងសំណើរសុំការអត្ថាធិប្បាយអំពីសេចក្ដីសម្រេចនេះ កាលពីម្សិលមិញទេ ។

សេចក្ដីសម្រេចដោយប្រើពាក្យធ្ងន់ៗរបស់សហភាពអឺរ៉ុបមានជំហរផ្ទុយគ្នាពីលទ្ធផលវាយតម្លៃរបស់សភាពអឺរ៉ុបទៅលើស្ថានភាពសិទ្ធិមនុស្ស និងស្ថានភាពបោះឆ្នោតដោយយុត្តិធម៌នៅក្នុងប្រទេសកម្ពុជា ។

កាលពីខែតុលាឆ្នាំ២០១២ មានការអនុម័តសេចក្ដីសម្រេចមួយ ដើម្បីអំពាវនាវឱ្យគណៈកម្មការអឺរ៉ុបស៊ើបអង្កេតករណីបណ្ដេញចេញដោយបង្ខំធ្វើឡើងដោយក្រុមហ៊ុនចម្ការអំពៅ ដែលទទួលបានសិទ្ធិអាទិភាពក្នុងការចេញទៅកាន់សហភាពអឺរ៉ុប ហើយដោយសារតែមានការផ្អាកការផ្ដល់ផលប្រយោជន៍ទាំងនេះចំពោះប្រទេសដែលត្រូវបានគេដឹងថា មានការរំលោភសិទ្ធិមនុស្ស ។

ទោះជាយ៉ាងណា កាលពីខែមីនា ឆ្នាំមុន សមាជិកគណៈកម្មការពាណិជ្ជកម្មសហភាពអឺរ៉ុប ក៏ដូចជាលោក ខេធ័រីន អាស្ទុន (Catherine Ashton) ប្រធានផ្នែកគោលនយោបាយការបរទេសសហភាពអឺរ៉ុបបានចុះហត្ថលេខាលើលិខិតមួយច្បាប់ដែលបញ្ជាក់ថា សហភាពអឺរ៉ុបមិនមានផែនការអនុវត្តប្រតិបត្តិការស៊ើបអង្កេតនៅក្នុងប្រទេសកម្ពុជាទេ ។

អង្គការសិទ្ធិមនុស្សនានាបានចោទប្រកាន់ក្រុមហ៊ុនចម្ការកៅស៊ូដែលនាំផលិតផលទៅទីផ្សារសហភាពអឺរ៉ុបថា មានការពាក់ព័ន្ធក្នុងការចាប់យកដីពីប្រជាជនក្រីក្រនៅតាមជនបទ ។ លើសពីនេះទៅទៀត អង្គការទាំងនេះបានរិះគន់សហភាពអឺរ៉ុបថា មិនបានស៊ើបអង្កេតករណីរំលោភតាមការចោទប្រកាន់នេះទេ ។ ក្រុមហ៊ុនកូកាកូឡាបានលើកឡើងកាលពីខែវិច្ឆិកាថា សកម្មភាពទន្ទ្រានយកដីធ្វើឡើងដោយក្រុមហ៊ុនចម្ការអំពៅ គឺជាទង្វើមិនអាចទទួលយកបានទេ ហើយខ្លួននឹងចាប់ផ្ដើមស៊ើបអង្កេតក្រុមហ៊ុននានាដែលជាអ្នកផ្គត់ផ្គង់ស្ករដល់ខ្លួន ដូចជាក្រុមហ៊ុនដែលមានចម្ការនៅក្នុងប្រទេសកម្ពុជាជាដើម ហើយនិងបញ្ឈប់ទំនាក់ទំនងអាជីវកម្មជាមួយក្រុមហ៊ុនផ្គត់ផ្គង់ណាដែលត្រូវបានរកឃើញថា មានការពាក់ព័ន្ធក្នុងការទន្ទ្រានយកដី ឬក៏ការរំលោភសិទ្ធិមនុស្ស ។

លោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំង បានលើកឡើងកាលពីម្សិលមិញថា សេចក្ដីសម្រេចរបស់សហភាពអឺរ៉ុប គឺជាសញ្ញាដ៏សំខាន់មួយសម្រាប់ទាំងគណៈកម្មការអឺរ៉ុបទាំងរដ្ឋាភិបាលកម្ពុជា ។ លោកបានមានប្រសាសន៍ថា "សេចក្ដីសម្រេចនោះគ្រាន់តែជាសេចក្ដីថ្លែងការណ៍មួយ ក៏ប៉ុន្តែវាអាចប៉ះពាល់គណៈកម្មការអឺរ៉ុប" ។ លោកបានបន្តទៀតថា "ពួកគេឱ្យសភាអឺរ៉ុបកំពុងស្នើឱ្យគណៈកម្មការអឺរ៉ុបអនុវត្តកិច្ចព្រមព្រៀងសហប្រតិបត្តិការរវាងប្រទេសកម្ពុជា និងសហភាពអឺរ៉ុប ហើយចែងមួយនៅក្នុងកិច្ចព្រមព្រៀងនោះនិយាយអំពីការគោរពសិទ្ធិមនុស្ស ។ ចែងនេះនឹងដាក់សម្ពាធទៅលើគណៈកម្មការអឺរ៉ុប" ។

ថ្លែងទាក់ទងទៅនឹងការទាមទារឱ្យមានការស៊ើបអង្កេតលើករណីបាញ់សម្លាប់អ្នកតវ៉ាគប់ដុំថ្មប្រាំនាក់ពីសំណាក់កម្លាំងរបស់លោកកាលពីថ្ងៃទី៣ខែនេះ លោក ខេង ទីតូ អ្នកនាំពាក្យកងរាជអាវុធហត្ថលើផ្ទៃប្រទេសបានលើកឡើងថា សហភាពអឺរ៉ុបគួរតែពេញចិត្តសេចក្ដីប្រកាសអំពីការស៊ើបអង្កេតក្នុងស្រុកទៅលើករណីបាញ់សម្លាប់នេះ ។

លោកឧត្តមសេនីយ៍ ខេង ទីតូ បានមានប្រសាសន៍ថា "នេះគឺជាបញ្ហាខ្មែរ" ៕ **សុធា**

*Continued from page 11*

## Vote 17 scores a...

The effort to enfranchise 17-year olds began at a Lowell City Council candidates' forum in 2009. The initiative, dubbed Vote 17 and organized by UTEC has had consistent local support and has been a constant presence on Beacon Hill, allowing local youth to experience civic engagement at the highest levels of state government. Massachusetts Speaker of the House Robert DeLeo remarked in July of 2012, "They [Vote 17 youth] could teach a lesson - and not just to young people - on how to lobby for a bill. They are tough, they are knowledgeable, and they are respectful. They're great!"

If the bill is approved by the state legislature, the question of granting 17-year -olds the right to participate (in municipal elections only) will be put before the voters of Lowell in the form of a ballot question.

តមកទំព័រទី ១២

## លោក ហ៊ុន សែន អំពាវនាវឱ្យអ្នកគាំទ្រ...

ប្រឆាំងទេ ហើយមានអ្នកខ្លះនិយាយថា ប្រសិនបើគណបក្សប្រជាជនកម្ពុជាចេញមកតវ៉ាវិញ នឹងគ្មានមនុស្សច្រើនទេ ។ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានចោទជាសំណួរថា "អ្នកឯងចង់ដឹង ឬចង់សាកលមើលទេ ប្រសិនបើ ហ៊ុន សែន ចេញមកធ្វើ? វានឹងមិនតូចទេ ហើយនឹងមានការចាត់វិធានការ ដូច្នេះត្រូវតែដឹងឱ្យច្បាស់ចំពោះរឿងនោះ ។ មិនមែនជាការគំរាមទេ តែនេះគឺជាការអនុវត្តច្បាប់" ។

កាលពីថ្ងៃទី៤ ខែមករា រដ្ឋាភិបាលរបស់លោក ហ៊ុន សែន បានបញ្ជូនមនុស្សស្លៀកពាក់ស៊ីវិលមួយក្រុមប្រដាប់ដោយដំបងដែកដំបងឈើ និងពូថៅចូលទៅទីតាំងទីលានប្រជាធិបតេយ្យក្នុងរាជធានីភ្នំពេញ ដើម្បីបោសសម្អាតក្រុមអ្នកគាំទ្ររបស់គណបក្សសង្គ្រោះជាតិរួមទាំងព្រះសង្ឃផង ដែលបានបោះជំរំនៅទីនោះអស់រយៈពេលពីរសប្ដាហ៍ដើម្បីទាមទារឱ្យមានការស៊ើបអង្កេត លើការបោះឆ្នោតជាតិដ៏ចម្រូងចម្រាសកាលពីខែកក្កដា ។

ការដើរក្បួន និងបាតុកម្មរបស់គណបក្សប្រឆាំងបានរីកធំឡើងៗ បន្ទាប់ពីបានរួមបញ្ចូលគ្នាជាមួយការតវ៉ារបស់កម្មកររោងចក្រកាត់ដេរដែលធ្វើកូដកម្មទាមទារដំឡើងប្រាក់ខែគោល និងការអំពាវនាវរួមគ្នារបស់ពួកគេបានផ្លាស់ប្ដូរទៅទាមទារឱ្យលោក ហ៊ុន សែន ចុះចេញពីអំណាចវិញ ។

មន្ត្រីកងរាជអាវុធហត្ថដែលត្រូវបានបញ្ជូនឱ្យទៅបង្ក្រាបកូដករដែលគប់ដុំថ្មដាក់សមត្ថកិច្ចនៅលើកំណាត់ផ្លូវវេងស្រេងក្នុងខណ្ឌពោធិ៍សែនជ័យ កាលពីថ្ងៃទី៣ ខែមករាបានបាញ់កម្មកររោងចក្រកាត់ដេរប្រាំនាក់ឱ្យបាត់បង់ជីវិត និងជាង៤០នាក់ទៀតរងរបួស ។

ទោះបីជារដ្ឋាភិបាលរបស់លោកបានព្យួរសិទ្ធិសេរីភាពក្នុងការជួបជុំ និងសិទ្ធិធ្វើបាតុកម្ម ដូចមានចែងនៅក្នុងរដ្ឋធម្មនុញ្ញកាលពីពីរសប្ដាហ៍មុន ក៏ដោយក៏លោក ហ៊ុន សែន កាលពីថ្ងៃសៅរ៍បានបញ្ជាក់ថា ដំណោះស្រាយចំពោះវិបត្តិនយោបាយកំពុងកើតមានរវាងគណបក្សប្រជាជនកម្ពុជា និងគណបក្សសង្គ្រោះជាតិត្រូវតែគោរពតាមរដ្ឋធម្មនុញ្ញ ដែលលោកបានព្យួរ ។

លោក ហ៊ុន សែន បានមានប្រសាសន៍ថា "ការទាមទារណាមួយដែលផ្ទុយពីរដ្ឋធម្មនុញ្ញមិនអាចទទួលយកបានឡើយ" ។ លោកមានប្រសាសន៍ទៀតថា គណបក្សសង្គ្រោះជាតិគួរតែបញ្ចប់ការធ្វើពហិការមិនចូលសភារបស់ខ្លួន ដែលបានបន្តអស់រយៈពេលជិតបួនខែ ដើម្បីដោះស្រាយស្ថានភាពជាប់គាំងក្រោយការបោះឆ្នោត ។ លោកបានមានប្រសាសន៍អំពីការធ្វើពហិការមិនចូលសភា និងបាតុកម្មរបស់គណបក្សប្រឆាំងថា "វាយូរពេកហើយ គួរតែគ្រប់គ្រាន់ហើយ" ។

លោកបានមានប្រសាសន៍ថា "ចូលសភាដោះស្រាយបញ្ហាជាមួយគ្នានៅណុងមិនចូលទេហីទៅ" នៅក្នុងអ្វីដែលទំនងជាការគំរាមមិនចំៗថា គណបក្សប្រឆាំងអាចនឹងបាត់បង់អាសនៈទាំង៥៥របស់ខ្លួននៅក្នុងរដ្ឋសភា ដែលលោក ហ៊ុន សែន បានគំរាមជាយូរមកហើយ ។ លោក ហ៊ុន សែន បានមានប្រសាសន៍បន្ថែមទៀតថា "ការដោះស្រាយបញ្ហាត្រូវតែធ្វើនៅក្នុងសភាមិនអាចធ្វើតាមចិញ្ចើមផ្លូវបានទេ" ។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្សសង្គ្រោះជាតិបានមានប្រសាសន៍ថា គណបក្សរបស់លោកបានធ្វើតែបាតុកម្មដោយសន្តិវិធីប៉ុណ្ណោះ ។ អ្នកនាំពាក្យគណបក្សសង្គ្រោះជាតិរូបនេះបានមានប្រសាសន៍ថា "អ្វីដែលយើងបានធ្វើរហូតមកទល់ពេលនេះ គឺបាតុកម្មសន្តិវិធីដើម្បីទាមទារដំណោះស្រាយសន្តិវិធីចំពោះការជាប់គាំងផ្នែកនយោបាយ ។ វាមិនមែនជាការធ្វើរដ្ឋប្រហារទេវា គឺជាសេរីភាពនៃការបញ្ចេញមតិ វាជាវិធីបើកផ្លូវសម្រាប់ការបោះឆ្នោតឡើងវិញ" ។

លោក កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិបានមានប្រសាសន៍ថា គណបក្សរបស់លោកនឹងមិនខ្លាចការបំភិតបំភ័យរបស់លោក ហ៊ុន សែន ឡើយ ហើយបាតុកម្មសន្តិវិធីនឹងនៅតែបន្ត ប្រសិនបើគណបក្សកាន់អំណាចមិនយល់ព្រមបោះឆ្នោតឡើងវិញទេនោះ ។ លោកបានបន្តថាហើយ ប្រសិនបើគ្មានសម្បទានពីគណបក្សប្រជាជនកម្ពុជាទេ សមាជិកសភាគណបក្សសង្គ្រោះជាតិនឹងមិនធ្វើឱ្យរដ្ឋាភិបាលរបស់លោក ហ៊ុន សែន ស្របច្បាប់តាមរយៈការទទួលយកអាសនៈរបស់ខ្លួននៅក្នុងរដ្ឋសភាឡើយ ។

លោក កឹម សុខា បានមានប្រសាសន៍បន្ថែមទៀតថា "នៅក្នុងប្រទេសយើងកំពុងរង់ចាំដំណោះស្រាយនយោបាយ ។ ប្រសិនបើមិនអាចដោះស្រាយបានទេ ហើយគណបក្សប្រជាជនកម្ពុជាមិនយល់ព្រមរៀបចំបោះឆ្នោតឡើងវិញ និងមិនចាប់ផ្ដើមធ្វើការស៊ើបអង្កេតលើភាពមិនប្រក្រតីនៅក្នុងការបោះឆ្នោតទេនោះ យើងនឹងបន្តធ្វើបាតុកម្មទៀត" ។ **សុខុម** (រាយការណ៍បន្ថែមដោយ Colin Meyn)

# ទីតាំងទេសចរណ៍ក្នុងសហរដ្ឋអាមេរិកទាំង២៥កន្លែងដែលស្ថិតក្នុងចំណាត់ថ្នាក់

**ដោយៈ សុខា**

Top 25 Destinations in the US

មួយក្នុងចំណោមមហាអំណាចសហរដ្ឋអាមេរិក មានវិសាលភាពទាំងប្រជាសាស្ត្រជាង៣០០លាននាក់ និងភូមិសាស្ត្រសរុប៥០រដ្ឋ។

មានទីតាំងទេសចរណ៍ក្នុងសហរដ្ឋចំនួន២៥កន្លែងដែលត្រូវបានជាប់ចំណាត់ថ្នាក់ជាទីតាំងទេសចរណ៍គួរជាទីពេញចិត្តដែលមិនគួររំលង។ ក្នុងនោះមានទីក្រុងចំនួន២៥ក្នុងរដ្ឋទាំងឡាយនៃសហរដ្ឋអាមេរិក រួមមាន ចំណាត់ថ្នាក់លេខ១ ទីក្រុងញូវយ៉ក New York City នៃរដ្ឋញូវយ៉ក (New York) លេខ២ ទីក្រុងសាន់ហ្វ្រាន់ស៊ីស្កូ (San Francisco) រដ្ឋកាលីហ្វរញ៉ា (California) លេខ៣ ទីក្រុងឈីកាហ្គូ (Chicago) នៃរដ្ឋអ៊ីលីណយ (Illinois) លេខ៤ ទីក្រុងឡាសវេហ្គាស (Las Vegas) នៃរដ្ឋណេវ៉ាដា (Nevada) លេខ៥ ទីក្រុងអរឡែនដូ (Orlando) រដ្ឋហ្វ្លរីដា (Florida) លេខ៦ រដ្ឋធានីវ៉ាស៊ីនតោនឌីស៊ី (Washington DC) សង្កាត់កូឡុំបៀ (District of Columbia) លេខ៧ ទីក្រុងបសស្តុន (Boston) រដ្ឋម៉ាសាឈូសេត (Massachusetts) លេខ៨ ទីក្រុងឡូសអេនជឺឡេស (Los Angeles) រដ្ឋកាលីហ្វរញ៉ា (California) លេខ៩ ទីក្រុងហូណូលូលូ (Honolulu) រដ្ឋហាវ៉ៃ (Hawaii) លេខ១០ទីក្រុងញូអរលីន (New Orleans) រដ្ឋលូវីសសាណា (Louisiana) លេខ១១ទីក្រុងស៊ីអាថល (Seattle) រដ្ឋវ៉ាស៊ីនតោន (Washington) លេខ១២ ទីក្រុងម៉ៃយ៉ាមិ (Miami) រដ្ឋហ្វ្លរីដា (Florida) លេខ១៣ ទីក្រុងសេដូណា (Sedona) រដ្ឋអារីហ្សូណា (Arizona) លេខ១៤ទី ក្រុងសាវ៉ាន់ណាហ៍(Savannah) រដ្ឋចចជីអា(Georgia) លេខ ១៥ទីក្រុងឆាលស្តុន (Charleston)រដ្ឋ សៅខារ៉ូ ឡាយណា(South Carolina) លេខ១៦ ទីក្រុងណាប៉ា ណាផា រដ្ឋកាលីហ្វរញ៉ា (California) លេខ១៧ ទីក្រុងសាន់អាន់តូនីយ៉ូ (San Antonio) រដ្ឋតិចសាស់ (Texas) លេខ១៨ទីក្រុងឡាហាអ៊ីណា (Lahaina) រដ្ឋហាវ៉ៃ(Hawaii) លេខ១៩ ទីក្រុងផតឡែន (Portland) រដ្ឋអូរីហ្គិន(Oregon) លេខ២០ ទីក្រុងហ្វីឡាដែលហ្វៀ (Philadelphia) រដ្ឋផិនស៊ីវីលញ៉ា(Pennsylvania) លេខ២១ ឆ្នេរម៉ារថល (Myrtle Beach) រដ្ឋខារ៉ូឡាយណាខាងត្បូង (South Carolina) លេខ២២ ទីក្រុងកោះកាអ៊ីលូអា ខូណា (Kailua-Kona) រដ្ឋហាវ៉ៃ(Hawaii) លេខ២៣ ទីក្រុងផាមស្ព្រីង (Palm Springs) រដ្ឋខារ៉ូឡាយណា (California) លេខ២៤ទីក្រុងណាផល (Naples) រដ្ឋហ្វ្លរីដា (Florida) លេខ២៥ ទីក្រុងហៅស្តុន (Houston) រដ្ឋតិចសាស់ ៕ Texas) ។ ឈ្មោះទីតាំងទេសចរណ៍ទាំង២៥កន្លែងនេះ ត្រូវបានផ្តល់លទ្ធផលដោយទ្រីបអែតវ៉ាយសឺ ប្រចាំឆ្នាំ២០១៣ (អ្នកប្រឹក្សាផ្នែកដំណើរកំសាន្ត) ។

ការចំណាយពេលលើការកំសាន្តធ្វើដំណើរទៅកាន់ទីទេសចរណ៍ផ្សេងៗមានអត្ថប្រយោជន៍ដល់សុខភាព និងផ្តល់ដល់ចក្ខុវិស័យរបស់លោកអ្នកឱ្យបានមានគំនិតថ្មីទទួលយកនូវសោភ័ណភាពស្រស់ស្រាយផ្លាស់ប្តូរបរិយាកាសរបស់លោកអ្នកពីការបំពេញការងារ និងកាតព្វកិច្ចផ្សេងៗ។ នេះជាផ្នែកមួយនៃការរស់នៅបែបបស្ចិមប្រទេសដែលមនុស្សផ្តល់ដល់ពួកគេផ្ទាល់នូវពេលវេលាសម្រាប់សប្បាយជាចំណែកមួយផ្តល់ឱ្យជីវិតមានអត្ថន័យ។ ចុងខែមករាឆ្នាំ២០១៤ ជារដូវរងារ ប៉ុន្តែមិនប៉ុន្មានខែទៀត រដូវផ្ការីក និងរដូវក្តៅនឹងឈានចូលមកដល់។ ការត្រៀមទុកនូវកាលវិភាគកំសាន្តក្នុងវិស្សមកាលខាងក៏នឹងជាគម្រោងល្អ សម្រាប់គូស្វាមីភរិយថ្មោងថ្មី ក្រុមគ្រួសារ និងជាមួយមនុស្សជាទីស្រឡាញ់ផងដែរ ៕

លេខ៩ ទីក្រុងកោះហូណូលូលូ នៃរដ្ឋហាវ៉ៃ

លេខ១៦ទីក្រុងណាប៉ា ល្បីល្បាញខាងផលិតស្រាទំពាំងបាយជូ

លេខ៨ ទីក្រុងឡូសអាន់ជឡេស

លេខ៧ ទីក្រុងបសស្តុន

## តមកពីទំព័រទី ១ ស្រុកខ្មែរមានខ្យល់ត្រជាក់ធ្លាក់ពី...

ធ្លាប់តែមានអំនួតមានល្បិចយកឈ្នះដោយ "ល្បែងអាប៉ោងស៊ីសងឥតបើកគ្រប" យូរមកហើយ តែងទទួលស្វាគមន៍កោតសសើរ យ៉ាងកក់ក្តៅពីសំណាក់អ្នកទទួលផលចំណេញ ឬពីអ្នកខ្លបខ្លាចអំណាចយោធានិយមរបស់លោកតែនៅសប្តាហ៍ពាក់កណ្តាលខែមករានេះខ្យល់ស្វាគមន៍ដ៏ត្រជាក់ស្រឹតបានធ្លាក់មកលើរបបលោកពីទិសអាមេរិកានឹងទិសយូរ៉ុបដែលទាំងពីរនាក់នេះជាខ្យល់ដកដង្ហើមចាំបាច់បំផុតសម្រាប់រដ្ឋបាលកម្ពុជា។ លោក ហ៊ុន សែន នឹងបរិវាកំពុងរងារយ៉ាងរណ្តំផ្កាម ដោយប្រធានាធិបតីអាមេរិកចុះហត្ថលេខាកាត់ជំនួយរីឯប្រធានសភាយូរ៉ុបក៏ធ្វើដូចគ្នាទៀត ហើយទាំងពីរទាមទារឱ្យលោក ហ៊ុន សែន រករមុខអ្នកសម្លាប់ក្រុមកម្មករដែលធ្វើកូដកម្មទាមទារជីវភាព-ឱ្យធានាគារពីភពលោកតាមដានការរើបអូសដីធ្លី រហូតមានដំណោះស្រាយជូនបាតុករដីធ្លី - ឱ្យមានការស៊ើបអង្កេតលើលទ្ធផលនៃកាបោះឆ្នោតខែកក្កដា២០១៣ រហូតដល់មានការយល់ព្រមចូលសភារបស់គណបក្សសង្គ្រោះជាតិ ។

លោក ហ៊ុន សែន មិនដែលស្គាល់ខ្យល់ត្រជាក់នាំទាំងធ្លាក់ព្រិលគ្រាប់ធំៗ ដូចនេះនៅឡើយទេ លោកតែងសំអាងអាវរងារចិន ឬយួនដែលសម្រាប់ពាក់ស្រុកក្តៅតែប៉ុណ្ណោះ។ លោកធ្លាប់ធ្វើឱ្យមនុស្សស្លាប់ច្រើននាក់នឹងច្រើនដងណាស់ហើយមិនដែលធ្វើឱ្យលោកព្រឺរោមបន្តិចណាទេ ស្រាប់តែពេលនេះមានហេតុអ្វីក៏ស្លាប់មនុស្ស៥នាក់សោះផលវិបាកក្លាយជាធំដល់ម្លឹង? គឺពេលវេលាវាមកដល់ ដូចគ្នានឹងអ្នកកាន់អំណាចផ្តាច់ការជាច្រើនដែលរីករាយអំណាចយូរពេកទៅភ្លេចគិតពីពេលត្រូវអស់អំណាចដែលមកដល់តែមួយប៉ព្រិចភ្នែកខំទុបក្រាញយ៉ាងណាក៏មិនជាប់ទាញទាំងមិត្តសម្លាញ់បងប្អូនកូនក្មួយឱ្យរងទុក្ខជាមួយគ្នាទាំងអស់ផង ។

មកទល់ថ្ងៃនេះ ថ្វីត្បិតតែគណបក្សប្រជាជនបិទមាត់ស៊ុមគ្រលុំជាមួយ ហ៊ុន សែន ក៏ដោយទាំងគណបក្សសង្គ្រោះជាតិទាំងសហគមន៍អន្តរជាតិហាក់ដូចជាទាមទារក្បាលនាយករដ្ឋមន្ត្រីតែម្នាក់គត់។ លោក ហ៊ុន សែន គឺជាឧបស័គ្គតែមួយគត់ដែលរាំងស្ទះ ១-លទ្ធផលពិតប្រាកដនៃកាបោះឆ្នោតសាកល ២-រាំងស្ទះកិច្ចចរចា ៣-រាំងស្ទះចលនាកម្មករនឹង ៤-ចលនាម្ចាស់ដី...តើមិត្តចិននឹងយួនជាសម្ព័ន្ធមិត្តនឹងមកជួយសង្គ្រោះ ហ៊ុន សែន ដោយរបៀបណា? តែក៏អាចច្រានទម្លាក់ឱ្យខ្លាស៊ីដៃររក្សាទុកតែគណបក្សប្រជាជនដែលនៅមាន "គ្រេឌីត"ខ្លះប៉ុណ្ណោះ។

ចំណែកខាងគណបក្សសង្គ្រោះជាតិវិញ ហាក់ដូចជាចម្លែកបន្តិចដោយសារថ្មីៗនេះ លោក សម រង្ស៊ី បានឆ្លើយនឹងសំនួរអ្នកសារព័ត៌មានចិនតាមទូរទស្សន៍ថា "លោកគាំទ្រចិន ចំពោះបញ្ហាកោះស្ប្រាតលី" យើងអាចយល់បានថា នេះជាបច្ចេកទេសនយោបាយសម្រាប់ផ្តាច់ចិនឱ្យដាច់ពីយួននឹងឱ្យចិនដាច់ពី ហ៊ុន សែន តែលោកបានបន្ថែមថា "យើងមិនមែនជាសម្ព័ន្ធមិត្តរបស់អាមេរិកាំងទេ!" ត្រង់នេះយើងក៏មិនយល់ដែរថា "ហេតុអ្វីក៏ចង់លោតទឹកសម្លាប់ខ្លួនលោកមានអីនាំឱ្យរងារដូច ហ៊ុន សែន ដែរទេឬ?"។ នេះជាប្រយោគភ្លៀវម្តងម្កាលដែលសាធារណជនពិបាកយល់...ប្រសិនបើ សម រង្ស៊ី បានជួបនឹងថ្នាក់ដឹកនាំចិន ហើយទទួលបាននូវការធានាអ្វីមួយដូចជាថា "ចិននឹងជួរដៃមកចាប់ **តទៅទំព័រទី ២៦**

# កិច្ចពិភាក្សាក្នុងសមាគមខ្មែរ

ដោយ : ចេម អស់ទិស

**ឡូវែល** : ប្រធានថ្មីរបស់សមាគមខ្មែរ អ្នកស្រី បុប្ផា ម៉ាឡូន បានបើកសម័យប្រជុំដ៏សំខាន់មួយ ដោយអញ្ជើញថ្នាក់ដឹកនាំខ្មែរក្នុងសហគមន៍




មកប្តូរយោបល់ផ្តោតទៅលើស្ថានភាពអនាគតរបស់សមាគមខ្មែរ និងតួនាទីរបស់ខ្លួនក្នុងសហគមន៍ ។

ស្របពេលជាមួយនេះលោក រ៉ាស៊ី អាន ជានាយកប្រតិបត្តិបានលាលែងពីដំណែងកាលពីថ្ងៃ១០មករា កន្លងទៅពុំទាន់មាននាយកថ្មីមកជំនួសនៅឡើយទេ អង្គប្រជុំដែលមានសមាជិកប្រមាណ៥០នាក់ ក៏បានលើកលក្ខណៈសម្បត្តិនៃការជ្រើសរកនាយកថ្មីមកពិភាក្សាជាមួយគ្នាដែរ ៕

**សូមអានអត្ថបទជាភាសាអង់គ្លេសសរសេរ ដោយ ដែម អស់ទិស**

## CMAA hosts
### Community Exchange

On January 18th, the Cambodian Mutual Assistance Association (CMAA), under the leadership of the new board chair Bopha Malone, convened a community exchange event at their headquarters in Lowell. The event was designed to foster discussion about the state of CMAA, its future, and its role within the Cambodian community of Lowell.

Despite a midday snowstorm that made transportation difficult, there was a capacity crowd of approximately 50 on hand for the three-hour discussion.The open forum touched on several topics, including collaborations with other organizations, the search for a new Executive Director to replace the outgoing Rasy An, and ways in which CMAA could improve their fundraising after losing government funding with the expiration of federal refugee status for the community.

Most of all the afternoon was an opportunity to exchange ideas and open a dialogue about the community's needs and expectations.Event organizers pledged to convene more forums like this in the future.





**Continued from page10**

**CANVASSING: LAST EFFORT...**

It is worth mentioning that the residents' lists was extracted from the database of voter registration, which is free to the public to be used for legal purposes. In the event that residents' names on the lists do not match the names of people currently living in the house, the canvassers will request permission to record the current resents' name, then send reports to the Health Care for All to update their data. The canvassers will spend two or three minutes at each house, asking basic questions such as:

Do you have health insurance?

What type of health insurance do have?

Do you have a story describing either a positive or negative experience you have had getting access to insurance or medical treatment at hospitals or primary care physicians at health clinics?

You are the occupant of the house have the rights not to answer to any questions posed by the canvassers.

If you are uninsured, two ways to get you and your family insured by logging into the website of the Massachusetts Health Connector at www.mahealthconnector.org to enroll to get health coverage or go directly to the Lowell Community Health Center (LCHC), locates at 161 Jackson Street, Lowell, MA 01852.

For residents who are insured through the MassHealth, you do not need to worry.

For residents who are insured through the Commonwealth Care or Medical Security Program (MSP) your health insurance plan will expire on March 31st and will need to enroll with the Health Connector or go to the LCHC to get health coverage.

The Health Care for All of Massachusetts is a nonprofit organization established to serve Massachusetts residents to get health insurance. The CMAA, also known as the Cambodian Mutual Assistant Association, was established in 1984 with a mission to improve the quality of life for Cambodian Americans and other minorities and economically disadvantaged persons in Lowell through educational, cultural, economics and social programs.

តមកពីទំព័រទី ១០

## ការចុះស្ទង់មតិ និងការចុះផ្សព្វផ្សាយ...

នៅក្នុងគោលបំណងនេះ យើងខ្ញុំសូមអំពាវនាវប្រជាជនទាំងអស់នៅទីក្រុងឡូវែល ជាពិសេសប្រជាជនអាមេរិកាំងដើមកំណើតខ្មែរបើកទ្វារស្វាគមន៍អ្នកស្ទង់មតិទាំងនោះ ព្រមទាំងចូលរួមចែករំលែកបទពិសោធន៍ទាំងឡាយដែលលោកអ្នកជួបប្រទះជាមួយនឹងក្រុមហ៊ុនធានារ៉ាប់រងសុខភាពរបស់លោកអ្នក ឬជាមួយនឹងមន្ទីរពេទ្យ ឬសេវាថែទាំសុខភាពតាមគ្លីនិកទាំងឡាយ ដើម្បីឱ្យមតិយោបល់របស់លោកអ្នកបានឮដល់អ្នកតាក់តែងច្បាប់ថ្នាក់រដ្ឋ និងថ្នាក់ជាតិផងដែរ ។ ក្នុងពេលជាមួយគ្នានេះ យើងខ្ញុំក៏សូមលើកទឹកចិត្តបងប្អូនខ្មែរក៏ដូចជាប្រជាជនទីក្រុងឡូវែលដែលមិនទាន់មានការធានារ៉ាប់រងសុខភាពរួសរាន់ចុះឈ្មោះ ដើម្បីទទួលបានការធានារ៉ាប់រងសុខភាព ។

អ្នកស្ទង់មតិរបស់សមាគមខ្មែរចំនួន ៥ ឬ ៦ នាក់ មានបេសកកម្មចុះទៅដល់ផ្ទះប្រជាជន ដើម្បីផ្សព្វផ្សាយអំពីសារៈប្រយោជន៍នៃការចុះឈ្មោះដើម្បីទទួលបានសេវាធានារ៉ាប់រងសុខភាពស្របតាមបទដ្ឋានថ្មីនៃកំណែទម្រង់សុខាភិបាលជាតិ ។ អ្នកស្ទង់មតិរបស់សមាគមខ្មែរនឹងចុះទៅដល់ ៥000 ផ្ទះរបស់ប្រជាជននៅក្នុងទីក្រុងឡូវែលរាប់ទាំងជនជាតិខ្មែរ និងជនជាតិផ្សេងទៀតផងដែរ ។ អ្នកស្ទង់មតិទាំងនោះនឹងមានបញ្ជីឈ្មោះរបស់ប្រជាជនក្នុងគោលដៅដែលត្រូវបានផ្ដល់ជូនដោយអង្គការ Health Care For All សម្រាប់ផ្ទៀងផ្ទាត់ជាមួយនឹងមនុស្សដែលរស់នៅក្នុងគេហដ្ឋានទាំងនោះ ។ គួរកត់សម្គាល់ថា បញ្ជីឈ្មោះនៃប្រជាជនទាំងនោះ គឺត្រូវបានគេស្រង់ចេញពីបញ្ជីទិន្នន័យកត់ឈ្មោះអ្នកបោះឆ្នោតដែលជាព័ត៌មានសាធារណៈសម្រាប់ការប្រើប្រាស់ស្របច្បាប់ ។ បើឈ្មោះនៅក្នុងបញ្ជីសម្រាប់ការចុះតាមផ្ទះមិនត្រូវនឹងឈ្មោះម្ចាស់ផ្ទះនោះអ្នកស្ទង់មតិនឹងសុំការអនុញ្ញាតដើម្បីកត់ឈ្មោះម្ចាស់ផ្ទះថ្មីរួចផ្ដល់ព័ត៌មាននោះទៅអង្គការ Health Care for All ដើម្បីធ្វើបច្ចុប្បន្នភាពទិន្នន័យ ។ លោកអ្នកជាម្ចាស់ផ្ទះមានសិទ្ធិឆ្លើយឬមិនឆ្លើយចំពោះសំណួរណាមួយរបស់អ្នកស្ទង់មតិ ។

អ្នកស្ទង់មតិទាំងនោះនឹងចំណាយពេលពីរ ឬបីនាទី នៅតាមផ្ទះនីមួយៗដោយសួរសំណួរមួយចំនួនដូចជា : តើអ្នកមានសេវាធានារ៉ាប់រងសុខភាពឬទេ ? តើសេវាធានារ៉ាប់រងសុខភាពដែលអ្នកកំពុងមាននោះមានឈ្មោះអ្វី? តើអ្នកជួបបទពិសោធន៍ល្អ ឬមិនល្អយ៉ាងណាខ្លះជាមួយនឹងសេវាទាំងឡាយដែលធានាផ្ដល់ជូនដោយក្រុមហ៊ុនធានារ៉ាប់រងសុខភាពដែលលោកអ្នកកំពុងមាន តើអ្នកជួបប្រទះបទពិសោធន៍ល្អ ឬមិនល្អយ៉ាងណាខ្លះក្នុងការទទួលបានសេវាថែទាំសុខភាពនៅតាមមន្ទីរពេទ្យ ឬគ្រូពេទ្យប្រចាំគ្រួសាររបស់អ្នកនៅតាមគ្លីនិកសុខភាពព័ត៌មានទាំងនោះនឹងមានប្រយោជន៍សម្រាប់អង្គការ Health Care for All ដើម្បីយកទៅចែករំលែកជាមួយនឹងសមាជិកសភា និងសមាជិកព្រឹទ្ធសភា ដើម្បីពិចារណាលើការកែប្រែច្បាប់ ឬផ្ដល់ឱកាសសម្រាប់ការអនុវត្តច្បាប់ Affordable Care Act ។ ការងាររបស់អ្នកស្ទង់មតិទាំងនោះ ចូលរួមក្នុងកិច្ចខិតខំប្រឹងប្រែងរបស់រដ្ឋាភិបាល ដើម្បីច្បាប់កំណែទម្រង់ប្រព័ន្ធសុខាភិបាលជាតិដែលជួយដល់រដ្ឋម៉ាស្សាឈូសិត ។

ប្រសិនបើលោកអ្នកមិនទាន់មានការធានារ៉ាប់រងលើសេវាថែទាំសុខភាពទេ សូមអញ្ជើញចុះឈ្មោះតាមបណ្ដាញអ៊ីនធឺណិតដោយចូលទៅគេហទំព័ររបស់ Massachusetts Health Connectortam mahealthconnector.org ដើម្បីទទួលបានការធានារ៉ាប់រងសុខភាព ។ គួរបញ្ជាក់ផងដែរថា Health Connector គឺជាទីភ្នាក់ងារឯករាជ្យរបស់រដ្ឋាភិបាលរដ្ឋម៉ាស្សាឈូសិតដែលជួយប្រជាជនរដ្ឋម៉ាស្សាឈូសិត ដើម្បីស្វែងរកបានការធានារ៉ាប់រងសុខភាព និងជៀសវាងទទួលការពិន័យនៅ




ពេលធ្វើបាយការណ៍ពន្ធដារចុងឆ្នាំ (តាក់ស៍) ។ ចំពោះប្រជាជនដែលគ្មានបណ្ដាញកុំព្យូទ័រសម្រាប់ចុះឈ្មោះ សូមអញ្ជើញទៅចុះឈ្មោះដោយផ្ទាល់នៅមជ្ឈមណ្ឌលថែទាំសុខភាពសហគមន៍នៃទីក្រុងឡូវែល (Lowell Community Health Center) ដែលមានអាសយដ្ឋាននៅ១៦១ Jackson Street, Lowell, MA 01852 ។ មជ្ឈមណ្ឌលថែទាំសុខភាពសហគមន៍នៃទីក្រុងឡូវែលមានបុគ្គលិកដែលចេះនិយាយភាសាខ្មែរ និងអ្នកបកប្រែភាសារង់ចាំជួយលោកអ្នកនៅក្នុងការចុះឈ្មោះដើម្បីទទួលបានការធានារ៉ាប់រងសុខភាពនេះ ។ លើសពីនោះទៀតលោកអ្នកអាចទូរស័ព្ទទាក់ទងបុគ្គលិករបស់មជ្ឈមណ្ឌលថែទាំសុខភាពសហគមន៍នៃទីក្រុងឡូវែលដោយផ្ទាល់តាមរយៈលេខទូរសព្ទនៅលើខិតប័ណ្ណជាភាសាខ្មែរដែលអ្នកស្ទង់មតិនឹងផ្ដល់ជូនលោកអ្នក ។ នៅក្នុងពេលជាមួយគ្នានោះលោកអ្នកក៏ប្រហែលជានឹងបានទទួលព័ត៌មានបន្ថែមដែលជួយលោកអ្នកសម្រេចចិត្តជ្រើសរើសក្រុមហ៊ុនធានារ៉ាប់រងសុខភាពបានយ៉ាងត្រឹមត្រូវផងដែរ ។ សម្រាប់ប្រជាជនដែលមានការធានារ៉ាប់រងសុខភាពជាមួយនឹងក្រុមហ៊ុន MassHealth (ម៉ាស់ ហែលថ៍) ពួកគាត់មិនចាំបាច់ធ្វើអ្វីទាំងអស់ ។ ប្រសិនបើមានការកែប្រែយ៉ាងណាមួយទៅលើផែនការនៃការធានារ៉ាប់រងសុខភាពរបស់ MassHealth នោះពួកគាត់នឹងទទួលបានផលប្រយោជន៍ប្រសើរជាងមុនទៀត ។ សម្រាប់ប្រជាជនដែលមានការធានារ៉ាប់រងសុខភាពតាមរយៈក្រុមហ៊ុនឈ្មោះ Common wealth Care ឬ Medical Security Program (MSP) សូមអញ្ជើញរួសរាន់ចុះឈ្មោះជាមួយនឹង Health Connector ឬទៅជួបបុគ្គលិកមជ្ឈមណ្ឌលថែទាំសុខភាពសហគមន៍នៃទីក្រុងឡូវែល ដើម្បីចុះឈ្មោះជាបន្ទាន់ ព្រោះថាការធានារ៉ាប់រងសុខភាពរបស់លោកអ្នកនឹងផុតពេលកំណត់នៅត្រឹមថ្ងៃទី ៣១ ខែមីនា ឆ្នាំ ២០១៤ ខាងមុខនេះ ។ សារនៅក្នុងខិតប័ណ្ណដែលអ្នកស្ទង់មតិផ្ដល់ជូនលោកអ្នកនៅតាមផ្ទះនោះ ក៏មានប្រយោជន៍សម្រាប់ប្រជាជនដែលមានការធានារ៉ាប់រងសុខភាពជាមួយនឹងក្រុមហ៊ុនឯកជនដែលលោកអ្នកកំពុងបម្រើការងារ ឬដែលលោកអ្នកទិញការធានារ៉ាប់រងសុខភាពដោយប្រាក់ផ្ទាល់ខ្លួនផងដែរ ។

អង្គការសេវាថែទាំសុខភាពសម្រាប់គ្រប់គ្នា (Health Care for All) នៃរដ្ឋម៉ាស្សាឈូសិត គឺជាអង្គការមិនរកកម្រៃមួយដែលបម្រើប្រជាជនទាំងអស់ឱ្យទទួលបានសេវាធានារ៉ាប់រងសុខភាព ។ អង្គការនេះខិតខំបង្កើតប្រព័ន្ធសុខាភិបាលមួយដែលផ្ដល់ជូនពួកអតិថិជននូវសេវាថែទាំសុខភាពក្នុងតម្លៃសមរម្យងាយទទួលយកសក្តិសមនឹងវប្បធម៌របស់ពួកគាត់ និងមានគុណភាពខ្ពស់ ។

រីឯសមាគមខ្មែរ (Cambodian Mutual Assistance Association) មានបេសកកម្មធ្វើឱ្យប្រសើរឡើងនូវគុណភាពជីវិតសម្រាប់ប្រជាពលរដ្ឋអាមេរិកាំងដើមកំណើតខ្មែរ និងក្រុមជនជាតិភាគតិចដទៃទៀតព្រមទាំងមនុស្សទាំងឡាយនៅក្នុងទីក្រុងឡូវែលដែលមិនមានឱកាសល្អខាងផ្នែកសេដ្ឋកិច្ចតាមរយៈការផ្ដល់សេវានានាតាមកម្មវិធីទាក់ទងនឹងការអប់រំ វប្បធម៌ សេដ្ឋកិច្ច និងសង្គម ។ គោលដៅរួមរបស់អង្គការទាំងពីរ គឺលើកកម្ពស់សុខភាពរបស់ប្រជាជនទាំងអស់ ដូច្នេះកិច្ចសហការរបស់អង្គការទាំងពីរនៅទីក្រុងឡូវែលពិតជានឹងហុចផលប្រយោជន៍ដ៏ប្រសើរដល់ប្រជាជនទីក្រុងឡូវែលទាំងមូលជាពិសេសប្រជាពលរដ្ឋអាមេរិកាំងដើមកំណើតខ្មែរ ៕

តមកពីទំព័រទី ០៩ នាឡិកាជេជអាយុ១០០ឆ្នាំ....

មករស់នៅបៀលីរីការដ្ឋម៉ាសាឈូសេត។ បន្ទិចក្រោយមកពេលដែលសង្គ្រាមស៊ីវិលអាមេរិកផ្ទុះឡើងលោក ដឹដលី ត្រូវជាប់ឈ្មោះបម្រើយោធានៅអាយុ១៧ឆ្នាំ។ លោកបម្រើការនៅកងពលទី៣៣ ចាប់ពីឆ្នាំ១៨៦២ រហូតដល់ចុងបញ្ចប់នៃសង្គ្រាមឆ្នាំ១៨៦៥។ ក្នុងនាមជាបេក្ខភាពម្នាក់នៃកងពលលេខ៣៣លោក ដឹដលី បានច្បាំងនៅក្នុងចម្បាំងល្បីជាច្រើនដូចជា ឆេនសេលឡឺវិល ហ្គេតធីស្បឺក ឆាថានូហ្គា អេតឡេនថា និងចម្បាំងនៅស៊ើម៉ែន ក្បែរសមុទ្រ។

លោក ដឹដលី បានបើកហាងទាំងអស់ខាងលើក្រោយពីនិវត្តន៍ពីសង្គ្រាម។ លោក ដឹដលី ជាសហគ្រិនមួយរូបដែលជាម្ចាស់ក្រុមហ៊ុនស្ករគ្រាប់នោះរហូតដល់លោកទទួលមរណភាពនៅអាយុ៩៨ឆ្នាំ នាថ្ងៃទី២០ វិច្ឆិកា ឆ្នាំ១៩៤២។ ហាងនោះបើកត្រឹមឆ្នាំ១៩៤៧ ជាឆ្នាំដែលហាងនោះត្រូវបិទទ្វារ។

រូបកាយលោក ដឹដលី ផេជ បានឃ្លាតឆ្ងាយពីយើង ប៉ុន្តែអនុស្សាវរីយ៍ និងការចងចាំតាមរយៈនាឡិកដែលមានរូបរាងប្រណិតមួយនេះតាំងនៅក្នុងជំហរមិនសាបសូន្យនៅឡើយ។ នាឡិកាគឺសាងសង់ក្នុងជំនាន់តែមួយនឹងនាឡិកានៅកំពូលសាលាក្រុង។ នាឡិការផេជ បានកសាងឡើងនៅខែមករាឆ្នាំ១៩១៤ ដោយក្រុមហ៊ុនសេតថូម៉ាស នៅខូនិកធិកខិត ហើយស្ថាបនាឡើងវិញនៅឆ្នាំ១៩៩០៕

Continued from page 09 **Page Clock ...**

Regiment from 1862 until the end of the war in 1865. As a member of the 33rd Regiment, he fought in many famous battles including Chancellorsville, Gettysburg, Chattanooga, Atlanta, and Sherman's March to the Sea.

After the war, Dudley opened his store, first selling candy but then adding ice cream, baked goods and other things. His Merrimack Street store filled five floors of the building. According to an advertisement in the 1932 Lowell City Directory, the D. L. Page Co. offered ice cream, candy, a bakery, a restaurant, a tea room, a soda fountain, catering and a delicatessen. The ad featured a drawing of the clock with the saying "At the Clock in the Sq." This refers Kearney Square,

which is the intersection of Merrimack, Bridge and Prescott Streets in downtown Lowell.

According to the 1940 census, Dudley Page was 96 years old that year and lived at 429 Andover Street with his 70 year old wife, Ella, and his 39 year old chauffer (driver) whose name was Clarence Kochersperger. For "occupation", the census listed Dudley as "president of food company." Dudley continued working at his candy business until his death on November 20, 1942 at age 98. The D. L. Page Company continued in operation until 1947 when it closed.

"Dudley Page may be gone,




but his memory remains with us because of the beautiful clock he placed on the sidewalk of Merrimack Street. The clock, made by the Seth Thomas Company of Thomaston, Connecticut (which also manufactured the clock atop Lowell City Hall) was refurbished in the 1990s but had again stopped working. Efforts are now underway to repair the clock so that it will always show the correct time while standing as a landmark for Lowell residents and as a memorial to Dudley Page. "

តមកពីទំព័រទី ១២ លោក បារ៉ាក់ អូបាម៉ា ចុះហត្ថលេខា...

សេចក្តីព្រាងថវិកានេះនឹងកាត់ផ្តាច់មូលនិធិជំនួយចំនួនប៉ុន្មានទេ។

លោកបានលើកឡើងនៅក្នុងអ៊ីមែលថា "យើងនៅតែគាំទ្រឱ្យមានការស៊ើបអង្កេតប្រកបដោយតម្លាភាពមួយទៅលើភាពមិនប្រក្រតីដែលត្រូវបានរាយការណ៍ អំឡុងការបោះឆ្នោតជាតិ កាលពីខែកក្កដាឆ្នាំ២០១៣ និងការអនុវត្តកម្មវិធីកំណែទម្រង់ ដើម្បីធានាថា ការបោះឆ្នោតដែលកំពុងបោះជំហានទៅមុខពិតគួរទុកចិត្តបានមែន"។ លោកក៏បានលើកឡើងវិញផងដែរថា ការកាត់ផ្តាច់ជំនួយរបស់សហរដ្ឋអាមេរិកនេះ នឹងមិនប៉ះពាល់ផ្ទាល់ដល់ពលរដ្ឋកម្ពុជាទេ។

លោកបានមានប្រសាសន៍បន្តទៀតថា "ការដាក់កំហិតនេះនឹងមិនប៉ះពាល់ដល់ជំនួយមនុស្សធម៌របស់យើង និងគម្រោងផ្សេងៗទៀតដែលផ្តល់ផលប្រយោជន៍ផ្ទាល់ដល់ប្រជាជនកម្ពុជាទេ"។

លោក ឯក ថា អ្នកនាំពាក្យរបស់អង្គភាពព័ត៌មាន និងប្រតិកម្មរហ័សនៅទីស្តីការគណៈរដ្ឋមន្ត្រីបានឱ្យដឹងថា គណបក្សប្រជាជនកម្ពុជាបានឈ្នះឆ្នោតយ៉ាងត្រឹមត្រូវ និងបានអំពាវនាវឱ្យពិចារណាក្នុងការកាត់ជំនួយ។

លោកបានមានប្រសាសន៍ថា "យើងកំពុងអំពាវនាវដល់អ្នកផ្តល់ជំនួយនានាប្រទេសជាមិត្តជិតឆ្ងាយកុំឱ្យកាត់បន្ថយ ឬផ្តាច់ជំនួយដល់កម្ពុជា ពីព្រោះក្នុងនាមប្រជាជនកម្ពុជាយើងត្រូវការជំនួយគាំទ្រក្នុងការអភិវឌ្ឍប្រទេស"៕ **ប៊ុនធី**

Continued from page 13 **CNRP Says EU Resolution a Strong ...**

The European Parliament's strongly-worded resolution stands in contrast to earlier E.U. appraisals on human rights and fair elections in Cambodia.

Ahead of July's election, a draft memo written by E.U. experts dismissed several audits of Cambodia's voter list that said up to 1 million voters could be disenfranchised during the election.

The independent analysis figure of 1 million could be attributed to an "unavoidable margin of error," the E.U. experts said. Several rights groups and election monitors met the E.U. memo with surprise.

In October 2012, a resolution was passed calling on the European Commission to investigate forced evictions on Cambodian sugar plantations receiving preferential access to the E.U., and for the suspension of those benefits "where human rights abuses are identified."

In March last year, however, the E.U.'s trade commissioners, as well as E.U. foreign policy chief Catherine Ashton, signed a letter saying that the E.U. had no plans to carry out any investigation in Cambodia.

Human rights groups have long accused sugar plantations exporting produce to the E.U. of engaging in land grabbing from the rural poor, and have criticized the E.U. for not investigating the alleged abuse.

The Coca-Cola Company said in November that land grabs by sugar plantations were "unacceptable" and that it would start investigating companies its sources sugar from, including firms with plantations in Cambodia, and put an end to its business with any found to be involved in land-grabbing or human rights abuses.

Opposition leader Sam Rainsy said Sunday that the resolution was a strong signal to both the European Commission and the Cambodian government.

"The resolution is just a statement but it could affect the European Commission," Mr. Rainsy said.

"They [the European Parliament] are asking the European Commission to implement the cooperation agreement between Cambodia and the E.U., and one provision of that is the respect for human rights. This will increase the pressure on the European Commission," he said.

Commenting on the demand for an investigation into the shooting dead of five stone-throwers by his forces on January 3, National military police spokesman Kheng Tito said that the E.U. should be satisfied by the announcement of a local investigation into the killings.

# CLASSIFIED ADS



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត តម្លៃ $10



របាំបុរាណខ្មែរ ដោយសាគូ សាមុត តម្លៃ $10



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត តម្លៃ $10



ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤ តម្លៃ $10



CAMBODGE តម្លៃ $5



អង្គការជានរណា? បីភាគ តម្លៃ $5/1

| | |
|---|---|
| Name | Phone # |
| Shipping Address | Email |
| City, State, Zip | Book Title(s) |

## BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
អាចទិញនៅអាស័យដ្ឋានៈ 45 Merrimack St., Suite 218A, Lowell, MA 01852



**HELP WANTED ជ្រើសរើសបុគ្គលិក**
A busy Restaurant in Philadelphia
Seeking for a Chef to cook full time
Competitive salary.
ត្រូវការចុងភៅ ធ្វើការពេញម៉ោងប្រាក់ខែល្អ
ធ្វើការក្នុងភោជនីយដ្ឋាន សំបូរភ្ញៀវចេញចូល នៅហ្វីឡាដែលហ្វៀ
Please call Jimmy for details.
សូមហៅ ជីមមី **215-688-1313**

**Freeland Interpreter Opportunity**
Lionbridge holds a contract with the Social Security Administration to provide interpreters for Disability Adjudication and Review. We are recruiting for freelance Khmer/Cambodianon-site interpreters for the Boston area.
Requirements: U.S. citizen or green card holder with some interpretation experience (preferred).
Starting rate $30/hr! Higher rates available for those with interpretation experience.If you are interested contact wasinterpresumes@lionbridge.com

## តមកពីទំព័រទី ៤ វាចារលោក វាសនា នួន នាឱកាស...

ដែលមិនបានធ្វើអ្វីដែលខ្លួន ត្រូវធ្វើនាពេលនោះ ខ្ញុំឥតបានធ្វើអ្វីខុសសោះតែគេយកយើងជាអ្នកទទួលខុសត្រូវរឿងផ្ទះខ្ញុំក៏អីចឹងមនុស្ស៥- ៦នាក់មកត្រួតពិនិត្យផ្ទះខ្ញុំគេមិនដែលធ្វើអីចឹងទេ អ្វីដែលគេមិននិយាយនោះ គឺមានអ្នកឈរឈ្មោះនៅពីក្រោយមានទំនាក់ទំនងជាមួយ "ឡូសាន់" ទៀត គឺគេមិនសប្បាយចិត្តនឹងខ្ញុំបោះឆ្នោតគាំទ្រប៉ាទ្រីក ម័រហ្វី ឱ្យធ្វើជា "មេយ័រ" ហើយ "ឡូសាន់" នេះចុះពីខ្ញុំទៀតថា ពួត១គ្នា ថាខ្ញុំនេះបាននិយាយហាមមិនឱ្យសហគមន៍ខ្មែរបោះឆ្នោតឱ្យលោកស្រី "រីដា ម័រសេ្យ" ដឹងរឿងហ្នឹងភ្លាមខ្ញុំបានឆ្លើយទៅលោកស្រីថា "ខ្ញុំមិនមានពេលឯណាទៅដើរប្រាប់អ្នកភូមិមិនឱ្យបោះឆ្នោតឱ្យលោកស្រីទេ" តែរឿងវាយប្រហារនៅតែចុះក្នុង "ឡូសាន់" ដដែល... គេមិនដែលសរសេរពីព័ត៌មានពួត១គ្នាអីចឹងទេ គេត្រូវតែមានភពខ្លួនឯងតែនេះជាការចាប់កំហុសមកលើខ្ញុំ។ ហ្នឹងហើយជាសង្គមយើងមកដល់ទីនេះយូរហើយ ឥឡូវគិតថាខ្លួនចាស់ដែរ ហើយដូច្នេះអាស៊ីគួរតែទទួលនូវការគាំទ្រការស្រឡាញ់ការមើលថែទាំ ដូចសាសន៍ឯទៀត១ដែរ អាស៊ីក៏បង់ពន្ធដូចគេដែរយើងក៏ចង់ជឿជាថ្មីទៀត តែមកទល់ពេលនេះអ្នកបានធ្វើអ្វីខ្លះហើយឱ្យសង្គមអាស៊ីហ្នឹង?

**ខ្មែរផុស:** សេចក្តីប្រាថ្នារបស់លោក គឺប្រជាជនអាស៊ីគួរតែទទួលបាននូវការគាំទ្រការស្រឡាញ់ការមើលថែរទាំ ដូចសាសន៍ដទៃទៀតនោះឬ?

**វាសនា នួន :** សេចក្តីប្រាថ្នាគេបានធ្វើរាល់តែឆ្នាំហ្នឹង បើខ្ញុំប្រាថ្នាថាឱ្យក្រុមប្រឹក្សាក្រុងហ្នឹងខាងមុខនេះ នឹងថែរទាំសហគមន៍ខ្មែរនោះ ក៏ប្រាកដជាមិនមែនសេចក្តីប្រាថ្នារបស់ខ្ញុំទេ សេចក្តីប្រាថ្នាដែលខ្ញុំចង់ឃើញចេញជារូបរាងនោះ គឺក្រុមប្រឹក្សាក្រុងដែលមានចម្រុះដោយដំណាងគ្រប់តំបន់នៃទីក្រុងឡូវែល ។

**ខ្មែរផុស:** តើការតស៊ូមតិរបស់លោកទៅថ្ងៃមុខ នឹងមានរូបរាងយ៉ាងណា?

**វាសនា នួន :** យើងត្រូវនាំគ្នា១ពន្យល់បងប្អូនខ្មែរយើងឱ្យទៅសុំចូលសញ្ជាតិអាមេរិកាំងដើម្បីឱ្យមានសិទ្ធបោះឆ្នោត២ណែនាំឱ្យបងប្អូនដែលមានសិទ្ធហើយនោះជឿលើតម្លៃនៃសន្លឹកឆ្នោត ហើយចេញទៅបោះឆ្នោត ពីព្រោះសព្វថ្ងៃនេះ ខ្មែរចេញទៅបោះឆ្នោតមិនបាន២០ភាគរយនៃសហគមន៍ខ្មែរនៅឡើយទេ ។ ម្យាងទៀតអ្នកចេះដឹងខ្មែរយើងមិនត្រូវនាំយករឿងរបស់ខ្មែរយើង ដូចជារឿងអាស្រូវនៅវត្តជាដើមទៅលាតត្រដាងតាមកញ្ចក់ទូរទស្សន៍ ឬតាមវិទ្យុផ្សាយសម្លេង ឬតាមកាសែតនោះទេ ពីព្រោះមានបរទេស ឬសាលាក្រុងក៏គេមើលដែរ ៕

**ខ្មែរផុស: សូមអរគុណ**


សាលាក្រុងឡូវែល


ពិធីសម្ពោធក្រុង...


...រៀននៅឡូវែល

# ស្វែងរកប្រធានក្រុងថ្មីសម្រាប់កាន់តំណែង

អត្ថបទដោយ :អ្នកនិពន្ធសារពត៌មានខ្មែរផុស

ប្រែសម្រួលជាខេមរភាសាដោយ : សុខា


City Manager Bernie Lynch

មួយសប្តាហ៍បន្ទាប់ពីលិខិតលាលែងរបស់ប្រធានក្រុងប៊ីនីលីនដែលគួរភ្ញាក់ផ្អើលនោះរួចមក ក្រុមប្រឹក្សាសាលាក្រុងត្រូវកោះប្រជុំពិក្សាជ្រើសរើសប្រធានក្រុងថ្មី។ ថ្ងៃអង្គារទី១៤ ក្រុមប្រឹក្សាក្រុងឡូវែលបានដឹកនាំការប្រជុំពិសេសចំនួនពីររួច ហើយដោយផ្តោតលើការពិភាក្សាអំពីដំណាក់កាលជ្រើសរើសប្រធានក្រុងថ្មី ។ គណៈប្រឹក្សាក៏ពិភាក្សាទៅលើដំណើរប្រព្រឹត្តទៅនៃការជ្រើសរើសសវនករថ្មីជំនួសកន្លែងសវនករបច្ចុប្បន្ន ស្ស៊ែរលី វ៉្រេថ៍ ដែលនឹងចូលនិវត្តន៍ឆាប់ៗនេះ។

ក្នុងចំណោមប្រធានបទដែលលើកយកមកពិភាក្សាក្នុងកិច្ចប្រជុំពិសេសទាំងអស់នោះ មានការផ្តោតទៅលើទំនួលខុសត្រូវការងារ និងលំដាប់ប្រាក់ខែដោយផ្អែកតាមគម្រូក្រុងរណបស្រដៀងៗគ្នា តួយ៉ាងក្រុងវ៉ស្ទឺជាដើម ។ ជាមួយគ្នានោះ ក្រុមប្រឹក្សា ក៏បានលើកនូវសំណួរមានសារសំខាន់ចោទទៅនឹងលក្ខខណ្ឌកិច្ចសន្យា ថាតើប្រធានក្រុងគួរតែបំពេញតួនាទីនេះដោយជាប់កិច្ចសន្យា ឬដោយមិនមានកិច្ចសន្យា។ ចំណោទមួយនេះជាការចោទចម្បងក្នុងរដូវកាលបោះឆ្នោតឆ្នាំ ២០១៣ ខណៈដែលប្រធានក្រុងលីនស្ថិតក្នុងកិច្ចសន្យាដែលកៀកនឹងឈានដល់ការផុតកំណត់។ តែចុងបញ្ចប់នៃការពិភាក្សាក្រុមប្រឹក្សាសម្រេចថា មិនកំណត់លក្ខខ្ខិកៈទៅលើជម្រើសកិច្ចសន្យានេះទេ។ ក្នុងនោះដែរ ក្រុមប្រឹក្សាក៏បានជជែកគ្នាអំពីប្រភពដែលសាលាក្រុងអាចប្រកាសផ្សាយព័ត៌មានជ្រើសរើសប្រធានក្រុងថ្មីនេះ ដោយរាប់បញ្ចូល

គម្រោងផ្សាយជ្រើសរើសប្រធានក្រុងថ្មីក្នុង

តទៅទំព័រទី ២៦

# Council discusses City Manager Search

*By KhmerPostUSA staff*

One week after the surprising announcement that Bernie Lynch would be resigning from the office of city manager, the Lowell City Council got to work on picking his successor. On Tuesday January 14th, the city council convened the first of two (thus far) special meetings to discuss the hiring process for selecting a new city manager. The council also discussed the hiring process for a new city auditor to replace the retiring Sheryl Wright as well

Among the topics of discussion during the special meetings were the new manager's job description and salary range, examining parameters in similar cities such as Worcester. The council also tackled the important question of whether the new manager would be offered a contract or not. The contract question was a major issue during the 2013 election, with Lynch's current contract set to expire this year. Ultimately, they decided to neither commit to nor rule out the option. Councilors also discussed where the job would be posted and advertised, several local and regional newspapers were mentioned during the proceedings including KhmerPostUSA.

At the conclusion of the second special meeting on January 21st, the city council decided to post the city manager's position with an application deadline of February 28th. The current manager's salary will be listed and terms of the new agreement will be listed as negotiable. Councilors will not see the resumes of applicants until the posting deadline has passed.

The council was not able to come to an agreement with Lynch to stay on as city manager throughout the budget process. Lynch's last day will be on March 11th.

*Continued from page 12* **Hun Sen Calls On CPP Voters To...**

striking for a higher minimum wage, and their joint calls shifted to demanding that Mr. Hun Sen resign.

Military police, deployed to suppress stone-throwing strikers on Pur Senchey district's Veng Sreng Street on January 3, shot dead five garment workers and injured more than 40 others.

Despite his government suspending the constitutional right to freedom of assembly and demonstration two weeks ago, Mr. Hun Sen on Saturday insisted that a resolution to the ongoing political crisis between the CPP and CNRP must strictly adhere to the very Constitution he has suspended.

"Any demand that is contradictory to the Constitution is unacceptable," Mr. Hun Sen said, adding that the CNRP should end their boycott of the National Assembly, which has lasted for nearly four months, in order to resolve the post-election deadlock.

"It has been so long, it should be enough," Mr. Hun Sen said of the opposition boycott of parliament and concurrent demonstrations.

"Either you enter the National Assembly or it's not your business," he said, in what appeared to be a veiled threat that the opposition could lose its 55 seats in parliament, which Mr. Hun Sen has long threatened.

"Solving the problem must be done in the National Assembly. It can't be done on the sidewalks," Mr. Hun Sen added.

CNRP spokesman Yim Sovann said his party had only ever held peaceful protests.

"What we have done so far is peaceful demonstrations to demand a peaceful solution to the political deadlock," Mr. Sovann said. "It is not a coup d'etat, it is the freedom of expression, it is the way to open the way for a re-election."

CNRP Vice President Kem Sokha said that the party would not be cowed by Mr. Hun Sen's intimidation, and peaceful protests would continue if his ruling party did not agree to hold a re-vote. And without concessions from the CPP, CNRP lawmakers would not legitimize Mr. Hun Sen's government by taking their seats in the National Assembly, he added.

"In the country, we are waiting for a political solution," he said. "If it can't be resolved and the CPP doesn't agree to organize a re-election and launch an investigation into election irregularities, we will continue to hold demonstrations."

# ជួបជាមួយនាយប៉ូលីសថ្មី វីល្លៀម អឹម. ថាយឡឺ

រៀបចំដោយនាយកដ្ឋានប៉ូលីសឡូវែល ថ្ងៃសៅរ៍ទី៨កុម្ភៈឆ្នាំ២០១៤

ជួបសំណេះសំណាលជាមួយប្រជាជនក្នុងសហគមន៍អាស៊ីអាគ្នេយ៍នៅអគាររៀបចំកម្មវិធីសំពៅមាស ផ្លូវ៤៥០ ជហេលមសហ្វ័រដ Street. Lowell, MA 01851 ។

សូមទាក់ទង ទៅសារ៉ា ឃុន តាមលេខទូរស័ព្ទ ៩៧៨-៦៧៤-៤៥០២ ។

## Meet your new Superintendent of Police William Taylor

William M. Taylor. A meeting organized by the Lowell Police Department dedicating to meet and greet the Southeast Asian community in Lowell on Saturday, February 8th, 2014 at 10:00AM. Sompao Meas Function Hall. 450 Chelmsford Street. Lowell, MA 01851. Contact Community Liaison Sara Khun at 978-674-4502.

Superintendent William Taylor



# កោះធម្មជាតិ រ៉ូម៉ែន និងស្រស់ស្អាតបំផុត កោះមូល





រមណីយដ្ឋានកោះមូលមានភ្ញៀវទៅទស្សនារាប់ពាន់នាក់មកពីជុំវិញ ពិភពលោក ហើយត្រូវបានរាប់ជាកន្លែងដែលទាក់ទាញបំផុតក្នុងចំណោមកន្លែងមួយចំនួនរបស់ខេត្តកោះកុង។ រមណីយដ្ឋាននេះមានទីតាំងនៅកន្លែងដ៏ពិសេសរបស់ខេត្តកោះកុងនៅជិតស្ថានសួគ៌។

កោះកុងត្រូវបានគេស្គាល់ថា "កោះធំបំផុតរបស់ប្រទេសកម្ពុជា" ហើយកោះមូលស្ថិតនៅមិនឆ្ងាយប៉ុន្មានពីក្រុងកោះកុងដ៏ស្រស់ស្អាត។ ទោះបីជាកោះកុងមានកន្លែងជាច្រើនដែលមិនទាន់មានឧស្សាហកម្មទេសចរ និងកំពុងរីកចម្រើន ហើយអ្នកនឹងឃើញកន្លែងដ៏ពិសេសៗដ៏គួរអោយចាប់អារម្មណ៍របស់ខេត្តកោះកុង។ រមណីយដ្ឋានកោះមូល (កោះកុងក្រៅ) មានចម្ងាយត្រឹមតែ២៤គីឡូម៉ែត្រពីចំណុចកណ្តាលក្រុង ហើយអ្នកអាចជួលរថយន្តមួយដើម្បីទៅទស្សនាកន្លែងដែលគួរអោយស្រលាញ់នេះ។ នេះគឺជាភាពរុងរឿងរបស់រមណីយដ្ឋានកោះមូល(កោះកុងក្រៅ) ក្នុងខេត្តកោះកុងដែលទាក់ទាញភ្ញៀវទេសចររាប់ពាន់នាក់។

ក្រៅពីកន្លែងកន្លែងដ៏ស្រស់ស្អាតនេះភ្ញៀវក៏អាចឃើញទឹកជ្រោះ និងចាប់អារម្មណ៍មុនពេលឃើញទឹកជ្រោះដ៏ស្រស់ស្អាតដែលធ្លាក់ពីកម្ពស់២៥ម៉ែត្រ។ ក្រៅពីទឹកជ្រោះភ្ញៀវទេសចរក៏អាចឃើញទឹកបាញ់ចេញក្នុងរមណីយដ្ឋានកោះមូល(កោះកុងក្រៅ)។ ក្រៅពីទឹកបាញ់អ្នកនឹងឃើញផ្សោតដែលរីករាយនឹងនៅជិតអ្នក។ នៅពេលដែលអ្នកឈរនៅជិតឆ្នេរសមុទ្រអ្នកពិតជាមានការភ្ញាក់ផ្អើលដែលឃើញផ្សោតខ្មៅ និងសដែលមិនខ្លាចមនុស្សប៉ះពាល់។



កូនរបស់អ្នកនឹងរីករាយជាមួយការសម្តែងរបស់ផ្សោតដែលរៀបចំដោយរមណីយដ្ឋានកោះមូល (កោះកុងក្រៅ) ខេត្តកោះកុងសម្រាប់ការកម្សាន្តសប្បាយរបស់ភ្ញៀវ។ ប្រសិនបើអ្នកមានផែនការស្នាក់នៅមួយរយៈអ្នកអាចស្នាក់នៅកន្លែង គួរអោយស្រលាញ់ណាមួយនៅជិតឆ្នេរសមុទ្រ។ ការដើរកម្សាន្តលើឆ្នេរសមុទ្រក្រោមពន្លឺព្រះចន្ទពេលយប់ជាបទពិសោធមួយដែលអ្នកមិនអាចបំភ្លេចបាន៕

## តមកពីទំព័រទី ២៤ ស្វែងរកប្រធានក្រុងថ្មីសម្រាប់...

សារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិកផងដែរ។

នៅឯកិច្ចប្រជុំជាលើកទីពីរនាថ្ងៃទី២១ មករា ឆ្នាំ២០១៤ ក្រុមប្រឹក្សាក្រុងសម្រេចផ្សាយជ្រើសរើសប្រធានក្រុងថ្មីដោយកាលកំណត់ដាក់ពាក្យ គឺនៅត្រឹមថ្ងៃទី២៨ ខែកុម្ភៈខាងមុខនេះ។ ចំពោះប្រាក់ខែ និងលក្ខខណ្ឌផ្សេងៗកំពុងអនុវត្តចំពោះប្រធានក្រុងនាពេលបច្ចុប្បន្ននឹងត្រូវយកមកពិភាក្សាលើតុចរចា។ ក្រុមប្រឹក្សាទាំងអស់នឹងមិនអាចពិនិត្យ ឬអានប្រវត្តិរូបសង្ខេបរបស់បេក្ខភាពដាក់ពាក្យឡើយរហូតដល់ហួសកាលបរិច្ឆេទកំណត់ទទួលយកពាក្យសុំ។

គួរបញ្ជាក់ផងដែរ ក្រុមប្រឹក្សាមិនបានទៅដល់កិច្ចព្រមព្រៀងជាមួយប្រធានក្រុងប៊ីនីលីនឱ្យបន្តតំណែងរបស់ខ្លួនជាប្រធានក្រុងដែលបានព្រៀងក្នុងកញ្ចប់ថវិកាឡើយ។ តួនាទីជាប្រធានក្រុងរបស់លីននឹងមានត្រឹមថ្ងៃទី១១មីនាឆ្នាំ២០១៤៕

## តមកពីទំព័រទី ១៨ ស្រុកខ្មែរមាន...

សង្គ្រោះជាតិ បើសម រង្ស៊ី ហ៊ានប្រកាសគាំទ្រ ចិនជាសាធារណ" តែនេះ២អាទិត្យហើយ គ្មានលេចព័ត៌មានពីចិនអ្វីបន្តិចសោះធ្វើឱ្យពាក្យ សម រង្ស៊ី នៅតែជាប្រយោគប៉ុនប៉ងអត្តឃាតនយោបាយដដែល ពីព្រោះចិននៅតែជាកុម្មុយនីស្ត នឹងជាសម្ព័ន្ធមិត្តខ្មែរក្រហមមានដៃប្រឡាក់ឈាមខ្មែរនៅឡើយ ។ នៅលើប្រយោគដ៏មានអាថិកំបាំងនេះយើងសួរខ្លួនឯងថា "កម្លាំងប្រជាពលរដ្ឋដូចពេលនេះល្មមទម្លាក់ ហ៊ុន សែន បាន ហើយ ឬនៅបានជាលោក រង្ស៊ី ហ៊ានប្រកាសបញ្ចោសទិសដូច្នេះ? ប្រសិនបើ ហ៊ុន សែន ធ្លាក់ ពីដំណែងមែន តើដំណែងនោះនឹងធ្លាក់មកក្នុងដៃសង្គ្រោះជាតិ ឬក៏អត់?"។

យើងនៅចងចាំនៅឡើយ ស្នាដៃចិនមកលើព្រះរាជបល្ល័ង្កអតីតកាលនឹងបច្ចុប្បន្ន មកលើព្រះប្រមុខរដ្ឋមុន មកលើខ្មែរក្រហម ក្រោយមកមកលើអ្នកតស៊ូនៅជាយដែនមកលើការបោះឆ្នោត១៩៩៣ ចុងបញ្ចប់ចិនវិនិយោគលេខ១នៅកម្ពុជា លទ្ធផលគឺមានតែថ្នាក់ដឹកនាំទេ ដែលមានមុខ ចំណែកឯពលរដ្ឋ គឺ "ទុកមិនចំណេញ ដកចេញក៏មិនខាត" ឬក៏ថា "រាស្ត្របង់ជំនឿលើនរណា ចុងបញ្ចប់អ្នកនោះជាអ្នកបោកប្រាស់"ទាំងអស់ ។ ដូច្នេះខ្យល់រងារបក់បោកពីលោកខាងលិចពេលនេះត្រជាក់ខ្លាំងណាស់ មិនគួរខ្មែរដែលមានឱកាសទទួលសេរីភាពហើយ រើសអាវរងារចិនមកពាក់ទៀតទៅ អាវលោកខាងលិចច្រើនត្រូវនឹងរាងកាយពលរដ្ឋ ហើយមានការកក់ក្តៅជាង... ទុកឱ្យ ហ៊ុន សែន ពាក់អាវរងារចិននឹងយួនតែម្នាក់ឯងទៅចុះ។

គណបក្សសង្គ្រោះជាតិពេលនេះ គួរយកពេលពន្យល់ពីបំណងលោក សម រង្ស៊ី ឱ្យបានច្បាស់លាស់ ពីព្រោះមានពលរដ្ឋស្លូតត្រង់ច្រើនណាស់នៅក្រោមជំនឿនឹងម្លប់ដឹកនាំរបស់លោក...អ្នកទាំងនោះសុទ្ធតែបានភ្លក់រស់ជាតិនយោបាយបងចិនយ៉ាងភ្ញៀវមាត់ស្ទើរផុតពូជទាំងអស់គ្នាទៅហើយ៕

ព័ត៌មានខ្លី

# រដ្ឋធានីវ៉ាស៊ីនតោន : បាតុកម្មអហិង្សាថ្ងៃទី២០មករា២០១៤

## Cambodian-Americans Demonstrated at Washington D.C.

ដោយប្រជាជនខ្មែរសញ្ជាតិអាមេរិកាំងបានប្រព្រឹត្តទៅនៅពីមុខស្ថានទូតខ្មែរប្រចាំសហរដ្ឋអាមេរិកដោយមានការចូលរួមពីចំនួនច្រើនកុះករនៃបាតុករប្រមាណជា១000នាក់ ។ តួលេខមួយនេះជាតួរលេខប្រវត្តិសាស្រ្តនៃអ្នកចូលរួមធ្វើបាតុកម្មដែលសម្តែងការព្រួយបារម្ភរបស់ពួកគេទាក់ទិននឹងការប្រើកម្លាំងបង្ក្រាបអ្នកតវ៉ាគួបផ្សំនឹងហេតុផលមួយទៀត គឺការសង្ស័យថា មានភាពអយុត្តិធម៌ចេញពីការបោះឆ្នោតនៅកម្ពុជា ។



Washington, DC, January 20, 2014. Over one thousand Cambodian-Americans held a peaceful rally in front of the White House today. This large number is historic due to their concerns over the recent use of excessive force and crackdown on protesters and the unfair election in Cambodia.

Cambodian-Americans wish to see justice and a real democracy in Cambodia. Afterward, they held a protest in front of the Cambodian Embassy in Washington, DC.



# ជោគជតារាសីលោកអ្នក

## ទាំង១២ប្រចាំឆ្នាំរោង

### ឆ្នាំជូត



រាល់ការបំពេញការងារទាំងឡាយ លោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

### ឆ្នាំឆ្លូវ



រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

### ឆ្នាំខាល



ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំថោះ



លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្ដាប់ឱវាទគ្នា ៕

### ឆ្នាំរោង



អាចពោលបានថា លោកអ្នកមានសេចក្ដីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរ នៅទីណាក្ដីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំម្សាញ់



លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះវាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហា ពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំមមី



រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់បើ អាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំមមែ



លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំវក



លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្ដីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្ដិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្ស តាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

### ឆ្នាំរកា



រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្ដល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់ គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

### ឆ្នាំច



នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

### ឆ្នាំកុរ



រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

# អ្វីដែលមិនគួរធ្វើ ដើម្បីការពារស្បែក



**ប្រសិនបើអ្នកជាមនុស្សដែលស្រឡាញ់សម្រស់ ហើយមិនចង់ឱ្យស្បែកឆាប់ជ្រីវជ្រួញមុនវ័យ ចាំបាច់ត្រូវការពារស្បែកពីកាំរស្មីអ៊ុលត្រាវីយ៉ូឡេ ហើយមិនបាច់ប្រើផលិតផលការពារពន្លឺថ្ងៃក៏បាន ប៉ុន្តែសុំឱ្យប្រើជាប្រចាំ :**

**-មិនត្រូវសំដិលថ្ងៃរាប់ម៉ោងដូចត្រីង្អើ :** តើអ្នកដឹងទេថា ស្បែករបស់អ្នកដែលប្រើឡេការពារកម្តៅថ្ងៃ SPF ខ្ពស់នោះ អាចការពារស្បែករបស់អ្នកបានច្រើនបំផុតត្រឹមតែ២ម៉ោងប៉ុណ្ណោះ ។ បើត្រូវហាលថ្ងៃបន្តទៅទៀត គួរតែស្លៀកពាក់ខោអាវឱ្យបានជិតល្អ និងពាក់មួកផង ។



**-ត្រូវគិតថាកាំរស្មីអ៊ុលត្រាវីយ៉ូឡេមានកម្រិតទាប :** ប្រសិនបើមិនមែនរដូវក្តៅគេច្រើនតែគិតថា កាំរស្មីអ៊ុលត្រាវីយ៉ូឡេមិនសូវក្តៅខ្លាំងណាស់ណាទេ ដែលជារឿងយល់ខុស ព្រោះកម្តៅថ្ងៃក្នុងស្រុកយើងក្តៅចិញ្ចាចចិញ្ចែងពេញ១ស្ទើររាល់ថ្ងៃ ។ ដូច្នេះមុនចេញពីផ្ទះអ្នកគួរតែលាបឡេការពារកម្តៅថ្ងៃឱ្យបានគ្រប់ពេល ទោះជាថ្ងៃក្តៅខ្លាំង ឬតិចក៏ដោយ ។

**-មិនគួរប្រើគ្រឿងសម្អាងដែលមានសមាសធាតុផ្សំរបស់ប្រេង :** ក្រោយពីសំដិលថ្ងៃហើយ អ្នកគួរតែប្រើផលិតផលរក្សាស្បែកដែលផ្តល់ភាពត្រជាក់ទៅឱ្យស្បែកឱ្យបានច្រើនជាងឡេដែលស្ថិតដោយប្រេង ព្រោះវានឹងធ្វើឱ្យស្បែកកាន់តែក្តៅខ្លាំង ហើយអាចធ្វើឱ្យអាលែកហ្សីស្បែកបាន ៕

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

ម្នាក់ៗធ្វើអ្វីៗទៅតាមទំនើងចិត្តនឹកឃើញរៀងៗខ្លួនក្នុងតំបន់ដែលខ្លួនកាន់កាប់ថែមទាំងឥតមានខ្សែបន្ទាត់នយោបាយណាមួយច្បាស់លាស់ឡើយ ។

ក្រោយពេលដែលបារាំងបានចាប់លោក សឺន ង៉ុកថាន់ នោះ លោកគ្រូអាចារ្យចខៀវ ជុំ និងលោកគ្រូអាចារ្យ អ៊ុក ជា ក៏បានភៀសខ្លួនទៅប្រទេសសៀមដែរ ។ ឯលោក នួន ដួង និងលោក ប៉ុណ្ណចន្ទ ម៉ុល បានគេចខ្លួនទៅនៅខេត្តបាត់ដំបងដោយមានការគាំទ្រពីលោក ប៉ុក ឃុន ដែលជាឪពុកមារបស់លោក ប៉ុណ្ណចន្ទ ម៉ុល ។ ពួកគាត់បានបង្កើតចលនាឥស្សរៈថ្មីមួយទៀតនៅចុងឆ្នាំ១៩៤៥ ដែលមានជាអាទិ៍ គឺលោក ហែម សាវ៉ាន្ស ហែម សាវ៉ាត្ស សាវូន្សនេត លាងសាយ្ស ចន្ទ តោត្រេះទ្រង់ ចន្ទរង្សី ។ល។ ក្រោយមកពួកនេះក៏បានទាក់ទងជាមួយលោក កៅ តក់ ស៊ីវ ហេង និងលោក ដាប ឈួន ដែលមានកងកម្លាំងខ្លះហើយនៅលើទឹកដីខ្មែរ ។

បន្ទាប់ពីមានកងកម្លាំងរៀងៗខ្លួនហើយ ឥស្សរៈក្រុមនេះក៏ខំពង្រីកតំបន់ត្រួតត្រារបស់ខ្លួនដាច់ៗពីគ្នាឥតមានការទាក់ទងគ្នាឡើយ ដូចជាទ្រង់ ចន្ទ រង្សី និង ចន្ទ តោត្រេះ បានទៅបង្កើតទីតាំងនៅខេត្តកំពង់ស្ពឺ ដាប ឈួន នៅខេត្តសៀមរាបកៅ តក់ នៅសំរោងចុងកាល់ស៊ីវ ហេង នៅខេត្តបាត់ដំបង។ ដើម្បីរកសោហ៊ុយចិញ្ចឹមកងកម្លាំង និងទិញអាវុធរបស់ខ្លួនពួកឥស្សរៈទាំងនេះបានរៃអង្គាសលុយកាក់ស្បៀងអាហារពីប្រជាពលរដ្ឋតាមស្រុក ភូមិ ឬជួនកាលចូលទៅប្លន់ចិននៅទីផ្សារក៏មានដែរ។ តមកក្រោយទៀត មានឥស្សរៈឯទៀតក៏បានកើតឡើងដែរ ដូចជាពួកអាចារ្យ យី អ្នកដុតគម្ពីរក្បួនខ្នាតនៅខេត្តកំពង់ចាម និងព្រៃវែង្ស ក្រុមពុត ឆាយ ក្រុមស័ក្តិ១ ធិញ និងក្រុមស័ក្តិ ៣ សៀប ដែលជាទាហានបារាំង ។ ពួកទាំងនេះដើរប្លន់អ្នកស្រុកនិងចិនផ្សារព្រមទាំងសង្កត់សង្កិនចាប់កូនក្រមុំអ្នកស្រុកតាមទំនើងចិត្តសាហាវឃោរឃៅរបស់ខ្លួនជាហេតុនាំឱ្យអ្នកភូមិអ្នកស្រុកភិតភ័យខ្លាចទាំងយប់ទាំងថ្ងៃ។ (មានពាក្យចចាមអារាមថា ក្នុងចំណោមពួកឥស្សរៈទាំងនោះក្រុមឥស្សរៈ ពុត ឆាយ ជាក្រុមដែលបារាំងបង្កើត ដើម្បីឃោសនាបន្លំឱ្យបណ្តាជនខ្មែរយល់ច្រឡំថា ជាក្រុមឥស្សរៈអ្នកជាតិនិយម) ។



និពន្ធដោយ ឡឹក សំអឿន ហៅ "ថ្កាយព្រឹក"

នៅឆ្នាំ១៩៥០ ដោយមានឧបសគ្គក្នុងការរត់ពន្ធអាវុធពីប្រទេសថៃទៅផ្តល់ឱ្យកងកម្លាំងរបស់ខ្លួននៅកូសាំងស៊ីននោះ ពួកយៀកមិញ តាមរយៈកងទ័ពប្រជាជនខ្មែររំដោះជាតិដែលនៅតាមជាយដែនខ្មែរ-សៀម ក៏បានខំព្យាយាមប្រឹងប្រែងបញ្ចុះបញ្ចូលក្រុមឥស្សរៈទាំងអស់ឱ្យចូលរួបរួមគ្នាធ្វើការតស៊ូទល់នឹងបារាំង ។ ក្រោយមកក្រុមឥស្សរៈដឹកនាំដោយ សីវ ហេង, លាង កែវមុនី, ប្រាក់ ខាន់ , ម៉ុផូ,មូល សម្បត្តិ, ឡាច សាវេន, អាចារ្យ ប៊ូ, អាចារ្យ ទុម និងម៉ា មួន ដែលជាម្តាយមីងលោក កៅ តក់ បានយល់ ព្រមចូលរួមជាមួយពួកយៀកមិញ ហើយក្រោយមកពួកយៀកមិញក៏បញ្ជូនទីប្រឹក្សា និងកងកម្លាំងជំនួយមកនៅជាមួយនៅសល់តែក្រុមទ្រង់ ចន្ទ រង្សី និងក្រុមលោក កៅ តក់ ពុំព្រមចូលរួមធ្វើសហប្រតិបត្តិការជាមួយយៀកមិញជាហេតុនាំឱ្យពួក ឡាវ កែវមុនី ធ្វើការវាយប្រហារនៅឃុំ ជ្រោយនាងងួន ស្រុកសំរោងចុងកាល់ ខេត្តសៀមរាប ។ តមកទៀត នៅឆ្នាំ១៩៥២ ក្រុម ដាប ឈួន ក៏ចូលរួបរួមជាមួយរាជរដ្ឋាភិបាល ។ ឯក្រុមស័ក្តិ៣ អ៊ូច ក៏បានចុះចូលជាមួយរាជរដ្ឋាភិបាលក្នុងឆ្នាំ១៩៥២ដែរ ដែលកាលនោះចលនាឥស្សរៈរួមខ្មែរបំរើជាតិបានកើតមានឡើង ក្រោមការដឹកនាំរបស់លោក សឺន ង៉ុកថាន់ នៅភាគខាងត្បូងប្រទេសក្នុងខេត្តតាកែវ និងខេត្តកំពត លោក ប៉ាវ ឈឺន និងលោក ចៅ សែន កុសល បានទទួលជំនួយពីយួន តាមរយៈលោក សឺន ថៃង្វៀង ដែលជាប្អូនប្រុសរបស់លោក សឺន ង៉ុកថាន់ ប៉ុន្តែក្រោយមកដោយឃើញថា ពួកខ្លួនជាខ្មែរនៅក្រោមការត្រួតត្រារបស់យួនយៀកមិញ ក៏បបួលគ្នាត្រឡប់មករួបរួមជាមួយរាជរដ្ឋាភិបាលវិញ ។

នៅថ្ងៃទី៧មករា ១៩៤៦ សម្តេចក្រុមព្រះ មុនី រ៉េត (ឪពុកមារបស់ហ្លួង សីហនុ) បានចុះហត្ថលេខាលើកិច្ចព្រមព្រៀងមួយជាមួយឧត្តមសេនីយ៍ អាឡិកសង់ឌ្រិយើរ ដែលជាអ្នកស្នងការនៃសាធារណរដ្ឋបារាំង។

កិច្ចព្រមព្រៀងនេះមានន័យថា ប្រទេសកម្ពុជាជារដ្ឋស្វយ័តឋិតនៅក្នុងសហព័ន្ធឥណ្ឌូចិនផង នៅក្នុងសហភាពបារាំងផង។ កម្ពុជាមានសេរីភាពពេញទីខាងផ្លូវនយោបាយផ្ទៃក្នុង ។ ដើម្បីឱ្យប្រទេសនេះឆាប់មានដំណើរស្រួលឡើងវិញ បារាំងត្រូវផ្តល់ជំនួយខាងផ្នែករដ្ឋបាល និងបច្ចេកទេសដោយត្រូវបញ្ជូនទីប្រឹក្សាមកធ្វើការអមដែលនិងអប់រំបុគ្គលិកខ្មែរ ។ កងទ័ពខ្មែរក៏និងត្រូវបង្កើតឡើង ។

តទៅលេខក្រោយ

# រូបមន្តធ្វើឲ្យសក់ពណ៌ ទន់រលោង

សក់ទន់រលោងស្រស់ស្អាត គឺជាផ្នែកមួយដែលជួយបង្កើនសម្ផស្សដល់មនុស្សគ្រប់រូប ។ ដោយឡែកសម្រាប់អ្នកដែលចូលចិត្តលេងពណ៌សក់ ឬហាយឡាយសក់ប្រហែលជាជួបនឹងការលំបាកបន្តិចដោយសារតែសក់ប្រែជា ស្ងួតគ្មានពន្លឺ ឬបែកចុង ។ ដូច្នេះគួរធ្វើដូចម្តេចទៅ ដើម្បីឱ្យសក់ពណ៌ភ្លឺរលោងស្រស់ស្អាត ? ខាងក្រោមនេះ គឺជាអាថ៌កំបាំងមួយចំនួនអាចដោះស្រាយបញ្ហានេះបាន ។

**1** .កក់សក់ឱ្យស្អាតដើម្បីកាត់បន្ថយការឡើងប្រេង ។

**2** . ប្រើ Hair Conditioner លាបចុងៗសក់ទុករយៈពេល២ទៅ៣នាទី ។

**3** . បន្ទាប់មកជូត ឬផ្លុំសក់ឱ្យស្ងួត ។ ចៀសវាងទុកឱ្យសក់ស្ងួតដោយខ្លួនឯង ព្រោះវាអាចធ្វើឱ្យសក់មានក្លិន-មិនល្អ និងបង្កឱ្យកើតអង្គែ ។

**4** .សម្រាប់អ្នកដែលអ៊ុតសក់ត្រង់ ហើយលាបពណ៌សក់ទៀតនោះ គួរអប់សក់១អាទិត្យម្តង ឬពីរដង ដើម្បីបំប៉នសរសៃសក់ឱ្យទន់ ។

**5** .លាបថ្នាំអប់សក់ទុកមួយថ្នាំងដៃពីស្បែកក្បាល (កុំឱ្យប៉ះស្បែកក្បាល) បន្ទាប់មកយក-ថង់ពាក់សក់ពេលងូតទឹក ឬកន្សែងពោះគោជ្រលក់ទឹកក្តៅឧណ្ហៗមកក្តោបសក់ទុករយៈពេលពី១៥ទៅ២០នាទី ។ ចុងក្រោយលាងសម្អាតសក់នឹងទឹកឱ្យជ្រះស្អាតល្អ ។ ម្យ៉ាងវិញទៀត ប្រសិនបើជាអ្នកកៀបសក់ញឹកញាប់ទៀតនោះ អ្នកគួរតែប្រើប្រាស់សេរ៉ូមបាញ់ការពារសរសៃសក់ដើម្បីជំនួយដល់សរសៃសក់ឱ្យទន់រលោងមិនជំពាក់ធ្វើឱ្យសក់រលាស់ល្អ និងមិនឆេះសក់ ។ ក្រៅពីនេះអ្នកត្រូវកំណត់សីតុណ្ហភាពម៉ាស៊ីនកៀបសក់របស់អ្នក ។ អ្នកដែលមានសក់ខូចខ្លាំង គួរប្រើសីតុណ្ហភាពពី១៨០ទៅ២០០អង្សា ៕